សារព័ត៌មាន ខ្មែរផុស ស.រ.អា

# KhmerPost USA

E-mail: info@khmerpost.us / Website : khmerpost.us
Advertising: 978-656-8141/ Hotline news: 978-942-1641

មាតិការរឿង

Issue 160 Aug 28th-Sept 09th, 2014

Free



New Office: Tel: (978) 677-7163 Fax: (978) 677-7092
45 Merrimack St. Suite 218A Lowell, MA 01852

## វិចារណកថា

# ហេតុអ្វីបានជាខ្មែរ ត្រូវតែទៅបោះឆ្នោត?



ពិន សំខុន

**ដោយ : ពិន សំខុន**

**ឡូវែល:** ការបោះឆ្នោតលើកនេះ ខ្មែរត្រូវតែទទួលស្គាល់ភាពអាម៉ាសរបស់ខ្លួន ចំពោះភាពគ្មានតំណាងរបស់ខ្លួនប្រចាំក្រុងឡូវែលដែលយើងដឹងថា សម្បូរខ្មែររស់នៅផ្តុំច្រើនជាងគេបំផុត នាស.រ.អា.នេះ ប្រសិនបើគ្មានតំណាងខ្មែរណាម្នាក់ជាប់ឆ្នោតនោះទេ។ នៅទីនេះជាផ្លូវការណ៍ខ្មែរមានចំនួនប្រមាណ៣ម៉ឺននាក់ តែស្ថិតិក្រៅផ្លូវការណ៍ គឺមិនតិចជាង៥ម៉ឺននាក់ទេ នៅលើចំនួននេះ បើគិតជាភាគរយខ្មែរមានដល់ទៅ៣០ភាគរយនៃចំនួនពលរដ្ឋឡូវែលទាំងអស់។ ជាងពេលណាទាំងអស់ការបោះឆ្នោតតំណាងសភារដ្ឋ គឺធ្វើនៅតែក្នុងសង្កាត់នៃក្រុងឡូវែលដែលមានខ្មែររស់នៅជុំគ្នារឹតតែច្រើនជាងមុនថែមទៀត ពីព្រោះ សង្កាត់ អេក័រ នឹង អាយឡិន រួមគ្នាបានជាសង្កាត់ មីឌលសិច១៨ មានខ្មែររស់នៅប្រមានជា៥០-៦០ភាគរយឯណោះ ។ បើមានខ្មែរជាប់ឆ្នោតទៅវិញ ជាការសមរម្យបំផុត **តទៅទំព័រទី ០៦**

# ពិភាក្សាទល់មុខសម្រាប់សង្កាត់ មីឌលសិច១៨_ថ្ងៃ១៩សីហា២០១៤

## 18th Middlesex Debate - August 19, 2014




**By Richard Howe Jr.**

▸ កាលពីថ្ងៃអង្គារកន្លងទៅ, កាសែតខ្មែរផុសស.រ.អា. បានរៀបចំ កិច្ចពិភក្សាតទល់រវាង **តទៅទំព័រទី ១៦**

# គណបក្សសង្គ្រោះជាតិបានទទួល ដំណែងជាអនុប្រធានទី១



សភាជាតិខ្មែរបានសម្រេចតែងតាំងថ្នាក់ដឹកនាំជាន់ខ្ពស់របស់ខ្លួនដោយបានបោះឆ្នោតឱ្យមានថ្នាក់ដឹកនាំជាន់ខ្ពស់របស់ខ្លួន កាលពីថ្ងៃទី២៦ សីហា កន្លងទៅ ។ សមាសភាពមានដូចតទៅ:
**១-** លោក ហេង សំរិន ជាប្រធានរដ្ឋសភា
**២-** លោក កឹម សុខា អនុប្រធានទី១ **៣-**លោក ងួន ញីល អនុប្រធានទី២។ ។ លោក សម រង្ស៊ី ថ្លែងនៅមុខរដ្ឋសភា បន្ទាប់ពីធ្វើកិច្ចប្រជុំចប់ថា "សេចក្តីសម្រេចនេះស្របតាមកិច្ចព្រមព្រៀងរវាងគណបក្សទាំងពីរ"។ រីឯគណកម្មការសភាផ្សេងៗទៀត ពុំទាន់អនុម័តបាននៅឡើយទេ៕

VMART
LOWELL

ចាប់បើកហើយ !



**ផ្សារម្ហូបអាស៊ី**
មានម្ហូបច្រើនមុខដល់ទៅ ១២,០០០មុខ
សាច់ស្រស់ និងម្ហូបធ្វើហើយ ម្ហូបស្រស់ៗ
មកពីបសស្តូន, ញូយ៉ក, និងគ្រប់កន្លែងទូទាំងប្រទេស
តម្លៃល្អបំផុត ! ស្រស់ថ្មីបំផុត !



# ជ័យលាភីនៃការប្រណាំងទូកអាស៊ីអាគ្នេយ៍នៅឡូវែល ឆ្នាំ២០១៤

# 2014 Lowell Southeast-Asian Water Festival Boat Race





Angkorian Warriors, 2014 1st Prize Winner pictured with Boat Race Coordinator Douang Phommasinh

**ប្រែសម្រួលដោយ : ខ្មែរផុសស.រ.អា**

**ឡូវែល:** ខ្មែរផុសស.រ.អា មានមោទនភាពនឹងសប្បុនស័រជ័យលាភីនៃការប្រណាំងទូកអាស៊ីអាគ្នេយ៍នៅឡូវែលឆ្នាំ២០១៤ គឺអង្គរានវ៉ារីយ័រ ។ តាំងបានប្រកួតច្រើនឆ្នាំមកហើយនេះគឺជាជ័យជំនះលើកទីមួយបានពានរង្វាន់លេខមួយថែមទៀត ។

ជើរីងុយមេកងអង្គរានវ៉ារីយ័របាននិយាយនៅលើឆាកថា រង្វាន់ជាលុយទាំងអស់នឹងជូនជាអំណោយដល់អ្នករងគ្រោះនៅផ្លូវប្រែន -ងុយបន្ថែមថា ខ្ញុំសូមថ្លែងអំណរគុណដល់លោកអ្នកទាំងអស់ដែលចូលរួមធ្វើឱ្យពិធីបុណ្យអុំទូកកើតឡើងបាន -ងុយចង់ឃើញមនុស្សច្រើនទៀតចុះឈ្មោះប្រណាំងទូកនៅឆ្នាំក្រោយ ។

ពេលប្រកួតផ្តាច់ព្រាត់ទូកអង្គរាវ៉ារីយ័រនៅប្រកិតពីក្រោយទូកភិតបើកថបគ្គនប្រមាន១០ហ្វីត ហើយក៏ប្រឹងរំកិលឡើងរហូតដល់បានឈ្នះ ហើយហ្វីតបើកថបគ្គនបានក្រឡាប់នៅពេលផ្តាច់ព្រាត់ -ឈ្នះបានតិចពេកទាល់តែគណកម្មការពិនិត្យរូបតាមវីដេអូ ទើបសម្រេចឱ្យឈ្នះ ជាស្ថាពរបានបញ្ហាថា តើទូកហ្វីតបើកថបគ្គនក្រឡាប់មុន ឬក៏ក្រោយសញ្ញាមកដល់ទីបញ្ចប់? តាមសម្តីឌួងភូមាស៊ីញអ្នកនាំពាក្យគណកម្មការប្រណាំងទូកបាននិយាយថា ទូកអង្គរានវ៉ារីយ័របានមកដល់ទី១វិនាទីមុនទូកហ្វីតបើកថបគ្គន ទូកអង្គរានវ៉ារីយ័រឈ្នះតែបន្តិចស្ទើរមិនគួរឱ្យជឿ បានទូកអង្គរានវ៉ារីយ័របានបង្ហាញនូវភាពរីករាយដោយច្រៀងរំលឹកពីឈ្មោះក្រុមគេម្តង ហើយម្តងទៀតថាយើងជានរណា? ជាអ្នកសង្គ្រាម! អ្នកសង្គ្រាមបានជួយស្រង់អ្នកធ្លាក់ទឹកជួយអូសទូកហ្វីតបើកថបគ្គនចេញពីទឹកបាចទឹកចេញពីទូក ។

តទៅទំព័រទី២១



Fitchburg Top Gun






ក្រុម Lady Khlahan

**Moniphal Bing- KhmerPost USA Intern**

LOWELL-KhmerPost USA has proudly sponsored the 2014 winner of the Southeast-Asian Water Festival Boat Race; the Angkorian Warriors. In their fifth year of competing, the Angkorian Warriors won their very first"First Place Trophy."

Jerry Guoy, the captain of the Angkorian Warriors, has made his final speech on-stage saying that, "All the prize moneys will be donating to the Branch Street fire victims. I would like to thank for the people who have help organized and make this festival happen." Guoy would like to invite more people to sign up for the boat race next year.

The Warriors were racing against the Fitchburg Top Gun at the grand finale. The Top Gun was leading to the finish line while the Warriors were rowing brutally side-by-side with Top Gun by ten feet behind. It was a toe-to-toe battle between the two competitors until the Top Gun had flipped over the boat approximately near the finish line. Both teams made it to the finish line by the spectators' viewpoint, but the referee need to replay the video to make sure who had actually won.

It was questionable that if Top Guns made it to the finish line before the flip or after the flip. Here was the review. According to Douang Phomm asinh, the referee and the boat coordinator for the festival, "The Warriors made it to the finish line by one second ahead." Miraculously, the Warriors had won in a very close battle.

The Angkorian Warriors showed a lot of spirits by chanting their team nameover and over again saying, "Who are we?! Warriors!"The Warriors helped the Top Gun by bringing the boat to shore and taking out all the water inside the boat. At the same time, the Warriors chanted their competitor name repeatedly saying, "Fitchburg… Top Gun!",which it had portrayed a

**Continued to page 21**

# លទ្ធផលថ្មីនៃពិធីបុណ្យអុំទូកអាស៊ីអាគ្នេយ៍

# The new outcomes at the Lowell Southeast-Asian Water Festival








**ឡូវែល:** ជារៀងរាលឆ្នាំពីធីអុំទូកអាស៊ីអាគ្នេយ៍តែងតែបង្ហាញនូវការផ្លាស់ប្តូរជានិច្ចក្នុងការទទួលភ្ញៀវបុណ្យអុំទូកដ៏ធំជាងគេបង្អស់នៅសហរដ្ឋអាមេរិកនេះ ។ នៅឆ្នាំនេះ មានការចូលរួមក្នុងពិធីបុណ្យប្លែកៗថ្មីថែមទៀត ជាមួយនឹងអ្នកសម្តែងសិល្បៈ អ្នកលក់នានានៃសហគមន៍ ឡាវ ថៃ វៀតណាមនឹងខ្មែរ ។

ជាលើកទីដំបូងបង្អស់ហើយ ដែលសហគមន៍ភូមាបានចេញមកបង្ហាញរបាំ

**តទៅទំព័រទី ១៥**





**By Moniphal Bing**

LOWELL- Every year, the Lowell Southeast-Asian Water Festival has delivered us with few changes in hosting the largest water festival event in America. For this year, the festival was more diverse with the Laotian, Thai, Vietnamese, and Cambodian vendors and performers.

For the first time, the Burmese community had done their traditional dance performances on stage of the Lowell Heritage State Park. The festival had given them in opportunity to expose their cultural origin to the visitors.

The food vendors had more Laotian and Thai cuisines, but there were very few Cambodian food vendors. Many Cambodian-merchandise vendors were from the far distance of Lowell. Also, the Information vendors from the local area had more Cambodian translators to serve the community. Cambodia Town of Lowell was not involved in the festival this year. **Continued to Page 15**






Everyone teaches, everyone learns.

Middlesex offers 75+ degree & certificate programs, and hundreds of noncredit courses. Earn a degree, begin a bachelor's degree or upgrade your skills.

- A price you can afford
- Small-class environment
- Flexible schedule
- Online or on campus

Classes begin
SEPTEMBER 3
REGISTER NOW!

STAY CONNECTED...



To learn more, call 1-800-818-3434 or visit www.middlesex.mass.edu

# បោះឆ្នោតបឋមនៅថ្ងៃ ៩កញ្ញា ២០១៤
# Primary Election on September 9, 2014

បោះឆ្នោតបឋមនៅរដ្ឋម៉ាសាឈូសេតធ្វើឡើងនៅថ្ងៃទី៩ កញ្ញា ២០១៤។ ការិយាល័យបោះឆ្នោតនឹងបើកទ្វារពីម៉ោង៧ព្រឹកដល់ម៉ោង៨ល្ងាច ។ ដោយសារតែនេះជាការបោះឆ្នោតបឋមម្ល៉ោះហើយនៅក្នុងថ្ងៃតែមួយមានការឆ្នោត២យ៉ាងដាច់ពីគ្នា: គឺគណបក្សប្រជាធិបតេយ្យបឋម និងគណបក្សសាធារណរដ្ឋបឋម។ នៅពេលទៅបោះឆ្នោតបើអ្នកចុះឈ្មោះជាប្រជាធិបតេយ្យគេនឹងឱ្យអ្នកទៅបោះឆ្នោតហិបប្រជាធិបតេយ្យ-បើអ្នកចុះឈ្មោះជាសាធារណរដ្ឋគេនឹងឱ្យអ្នកបោះឆ្នោតហិបសាធារណរដ្ឋ - បើអ្នកមិនទាន់បានជ្រើសយក១ណានៅឡើយ អ្នកត្រូវជ្រើសយកហិបបោះឆ្នោតណាមួយមកប្រើ។

ឆ្នាំនេះមានការិយាល័យសំខាន់ៗជាច្រើនចេញដាក់ឱ្យបោះឆ្នោត ។ មានករណីខ្លះបេក្ខជនដែលបន្តកាន់ការការិយាល័យគ្មានអ្នកប្រឆាំងពីគណបក្សខ្លួនឯង ដូច្នេះមានឈ្មោះលេចចេញមកនៅលើហិប ហើយអ្នកអាចនឹងបោះឆ្នោតឱ្យបាន ។ នៅពេលដែលមានបេក្ខជនតែ១ គេហៅថា គ្មានអ្នកប្រឆាំងនៅកន្លែងខ្លះទៀតមានអ្នកប្រឆាំងដល់ទៅ២-៣នាក់។ ទោះជាយ៉ាងណាក៏ដោយឈ្នះឆ្នោតថ្ងៃ៩ កញ្ញា ហើយគ្រាន់តែជាតំណាងគណបក្សខ្លួនឯងទេ រីឯឈ្នះឆ្នោតថ្ងៃទី ៤វិច្ឆិកា ទើបបានជាតំណាងរដ្ឋ ។

The Massachusetts State Primary Election is on Tuesday, September 9, 2014. Polling places will be open from 7:00 a.m. until 8:00 p.m. Because this is a primary election, there are two separate elections on the same day: The Democratic Primary and the Republican Primary. When you go to vote, if you are registered to vote as a Democrat, you will be given a Democratic ballot. If you are registered as a Republican, you will be given a Republican ballot. If you are not registered in either party (you are an "unenrolled" voter) you must choose which party's ballot to use.

Many important offices are on the ballot this year. In some cases, the person who now holds the office (the incumbent) has no opposition from within his own political party so only his name appears on the ballot and voters may still vote for him. When there is only one candidate, he is said to be "unopposed." For other offices there are several candidates. Whoever wins the election on September 9 will be the representative of his political party in the State Election on November 4, 2014.

ខាងក្រោមនេះជាការិយាល័យមានឈ្មោះនៅលើហិបឆ្នោត ហើយនិងបេក្ខជនឈរឈ្មោះឱ្យគេបោះថ្ងៃ ៩ សីហា

Here are the offices that are on the ballot and the candidates who are running for them on September 9, First the Democrats:

U.S. Senator - **Edward Markey** - unopposed. Markey was elected last June to fill the term of John Kerry who became Secretary of State. Markey must now run for a full six year term.

Congress - **Niki Tsongas** - unopposed.



២-អ៊ីដ ម៉ាគី Ed Markey

៣-នីគី តុងហ្គាស Niki Tsongas

Tsongas was elected in 2007 and is a candidate for re-election this year.

Governor - the chief executive of Massachusetts. Current Governor Deval Patrickis not running for re-election. The candidates seeking to take his place are **Martha Coakley, Steve Grossman** and **Don Berwick.**

Continued to page 05



CONWAY
INSURANCE AGENCY

រយៈពេល២៥ឆ្នាំ ភ្នាក់ងារធានារ៉ាប់រងខុនវេយបានបម្រើសហគមន៍ដោយធានារ៉ាប់រងគ្រប់មុខប្រកបដោយគុណភាពនៅតំបន់ញូអ៊ីងឡែន ។

យើងខ្ញុំជាភ្នាក់ងារបំពេញសេវាគ្រប់មុខដូចខាងក្រោម :

ការធានារ៉ាប់រងគ្រួសារ
- រថយន្ត
- ផ្ទះ
- ផ្ទះល្វែង
- គ្រឿងអលង្ការ
- វត្ថុសិល្បៈ
- វត្ថុបុរាណ

ការធានារ៉ាប់រងជំនួញ
- អចលនវត្ថុ
- សុវត្ថិភាពជំនួញ (Liability)
- សុវត្ថិភាពជំនាញ (Professional Liability)
- វិកខឺខម (Worker's Compensation)
- បនដស៍ (Bonds)
- អ្នកមើលថែឡាន និងការ៉ាស់ឡាន
- ធានារ៉ាប់រងពិការភាព និងជីវិត
- កម្មវិធីពិសេសផ្សេងៗទៀត



77 E. Merrimack Street. Lowell, MA 01852
Tel: 978-454-5054|Fax 978-453-2480
www.conwayinsurance.com
សូមទាក់ទងមក : ហ្វីលីប មុត, អ្នកគ្រប់គ្រង



ឱសថស្ថាន ស៊ីសាយដ៍
SEASIDE PHARMACY
169 Shirley Ave Revere, MA
(781) 284-6525




- និយាយដោយផ្ទាល់ទៅកាន់ឱសថការី
- បញ្ជូនដល់គេហដ្ឋានបើចាំបាច់
- ទទួលប័ណ្ណធានារ៉ាប់រងម៉ាស់ហេល្ស និងប័ណ្ណធានារ៉ាប់រងផ្សេងទៀត
- អាចបន្ថែមឡើងវិញនូវវេជ្ជបញ្ជាទាំងអស់ក្នុងពេលតែមួយ
- ផលិតផលនិងសម្ភារៈមាននៅបញ្ជរតាំង
- ងាយស្រួលបញ្ជូន សូមនាំយកនូវដបថ្នាំរបស់លោកអ្នក យើងខ្ញុំជួយចាត់ចែងឱ្យ



ផ្ទេរនូវវេជ្ជបញ្ជារបស់លោកអ្នក ហើយទទួលបាននូវវីតាមីនមួយកំប៉ុងជារៀងរាល់ខែ

Continued from Page 04

# PRIMARY ELECTION ON....

Lieutenant Governor -becomes Governor if the Governor is unable to serve. Our last Lieutenant Governor, **Tim Murray,** resigned in 2013 and was


៣-ដន ប៊ើរីក
(Don Berwick)


២- ម៉ាសា ខូកលី
(Martha Coakley)


១-ស្ទីវ ក្រសមែន
(Steve Grossman)

not replaced. The candidates running for Lieutenant Governor are **Steve Kerrigan, Mike Lake** and **Leland Cheung.**

Treasurer - in charge of the state's bank accounts and the state lottery. The current Treasurer, Steve Grossman, is running for


១- ស្ទីវ ខឺរីហ្គេន
(Steve Kerrigan)


២- ម៉ៃខ៍ ឡេក
(Mike Lake)


៣- លីឡែន ឈឹង
(Leland Cheung)

Governor. The candidates running for Treasurer are **Barry Finegold, Deb Goldberg** and **Tom Conroy.**

Attorney General - the state's chief lawyer. The current Attorney General, Martha Coakley, is running for Governor. The candidates running for


៣- បែរី ហ្វាញហ្គោល
(Barry Finegold)


១- ឌិប ហ្គលប៊ឺដ
(Deb Goldberg)

Attorney General are **Maura Healey** and **Warren Tolman.**

Secretary of State - in charge of state records, corporations, elections and securities. The current Secretary of State, **William Galvin,** is running unopposed for re-election.


២- ថម ខុនរ៉យ
(Tom Conroy)

State Auditor - inspects state financial records and procedures. The current State Auditor, **Suzanne Bump,** is running

**Continued to Page 07**


១- វ៉ារិន ថុលមែន
Warren Tolman)


Khmer Owned & Operated

The Joint Commission National Quality Approval

Independence Home Care
Health Services LLC

ថែរក្សាសុខភាពដល់លំនៅដ្ឋានរបស់អ្នកទូទាំងរដ្ឋ

**Licensed Home Care Provider / Companion Services**

Certified Medicare/Medicaid • Joint Commission Accreditation • Home Nursing Care Provider Licensed by RI Department of Health

**Approved Provider of All State Programs:** Department of Elderly Affairs / Department of Human Services

**Skilled Nursing**
- Registered Nurses
- Home Health Aide
- Physical Therapy
- Occupational Therapy
- Speech Therapy
- Medical Social Worker

**Unskilled Nursing**
- Companionship
- Personal Care
- Bathing
- Dressing
- Safety
- Meal Preparation and Housekeeping
- Medication Reminders
- Errands and Assistance with Transportation

**Employment**
**Nurses & CNAs**
- Helping Over 100 Rhode Island Elderly Southeast Asians
- We Employ Over 50 Southeast Asians
- FREE ASSESMENT

*Let our family, take care of yours.*

**CALL US TODAY!**
**(401) 437-8337**
www.independencehs.com
Available 24/7

1179 Elmwood Ave.
Providence, RI 02907

- See our Khmer Video about Home Care at our website -

តមកពីទំព័រទី ០១

## ហេតុអ្វីបាន...

គ្មាននរណាចំអកឱ្យទេ នៅតំបន់ខ្មែរគួរតែខ្មែរជាប់ឆ្នោតយ៉ាងនេះឯង។ នៅមានការបោះឆ្នោតច្រើនឋានានុក្រមទៀត នាថ្ងៃទី៩ កញ្ញា២០១៤ តែយើងលើកតែពីតំណាងសភារដ្ឋមកនិយាយ ពីព្រោះមានខ្មែរជាបេក្ខជនដល់ទៅ២រូបក្នុងតួនាទីតែមួយនោះ។

**កិច្ចប្រជុំពិភាក្សាទល់មុខនៅទូរទស្សន៍អិល.ឌី.ស៊ី:** កិច្ចប្រជុំកាលពីថ្ងៃទី១៩ សីហានេះ មានសារៈសំខាន់ណាស់ សម្រាប់ឱ្យម្ចាស់ឆ្នោតមើលឃើញថា បេក្ខជនណាមានវោហាតិតគួរពីបញ្ហាមណ្ឌលរបស់ខ្លួនបានប្រសើរជាងគេមានស្មារដៃនឹងការសន្យា គួរឱ្យជឿបានឆ្លើយតបនឹងអ្នកសំនួរអ្នកសរសេរកាសែត។ គេឃើញបេក្ខជនសម្រាប់សភារដ្ឋមាន៥រូបរួមទាំងខ្មែរ២រូបផង មានសំនួនវោហាក្បោះក្បាយច្បាស់លាស់ ពីតួនាទីនឹងកាតព្វកិច្ចនឹងចំណូលចិត្តរបស់ខ្លួនលើយទេ យល់ថាទាំងខ្មែរទាំងអាមេរិកាំងអាចក្លាយជាគូរប្រជែងស្មើភាពគ្នាបានហើយ...តែគ្មាននរណាម្នាក់បានឆ្លើយនឹងសំណួរមួយស្តីពីអាទិភាពរបស់សង្កាត់ដែលសម្បូរខ្មែររស់នៅច្រើនបំផុត គឺត្រូវការខ្មែរជាតំណាងនៅទីនោះនៅឡើយទេ។




**សំណាងល្អរបស់បេក្ខជនខ្មែរមានតិច :** មនុស្សចាស់ស្រុកខ្មែរ២រូបឈរប្រជែងគ្នាដណ្តើមអាសនៈតែមួយរបស់សភារដ្ឋនៅសង្កាត់ មីឌុលសិច១៨ នឹងធ្វើឱ្យពលរដ្ឋម្ចាស់ឆ្នោតឆ្ងល់រារែកក្នុងចិត្តមិនដឹងជាបោះឆ្នោតឱ្យនរណា? សន្លឹកឆ្នោតនឹងចែកជាពីរដោយយោងទៅតាមគំនិតដែលថាខ្មែរតែងតែបោះឆ្នោតឱ្យខ្មែរគ្នាឯង ឬក៏ការរារែកចិត្តនឹងធ្វើឱ្យគាត់មិនទៅបោះឆ្នោតតែម្តងព្រឹត្តិការណ៍ទាំងពីរនេះនឹងកើតឡើង បើមិនដោះស្រាយឱ្យពួកគាត់ភ្លាមៗទេ ។ គេថាខ្មែរមិនចូលចិត្តទៅបោះឆ្នោតទេ! ជាការមិនពិតទេ ពីព្រោះតែខ្មែរបានចុះឈ្មោះទៅបោះឆ្នោតប្រមាណ៧-៨ពាន់នាក់រួចទៅហើយ ហើយពួកគាត់អាចនឹងផ្តល់តំណែងសំខាន់ណាមួយដល់បញ្ញវន្តខ្មែរបានឱ្យតែគាត់ស្រួលមានជំនឿ ហើយចង់ទៅបោះឆ្នោតឱ្យខ្មែរតែបេក្ខជនខាងខ្មែរទេ ដែលបង្កើតបញ្ហាធ្វើឱ្យគាត់រារែក... មិនបោះឆ្នោតឱ្យអាមេរិកាំងមិនជាការលំបាកទេ តែមិនបោះឆ្នោតឱ្យខ្មែរលំបាកណាស់។

**សន្លឹកឆ្នោតនឹងបែកៈ** នឹងមានម្ចាស់ឆ្នោតបោះឆ្នោតឱ្យបេក្ខជនទាំងអស់ទោះតិច ឬច្រើន

តទៅទំព័រទី ២៥


# VOTE FOR MAURA HEALEY
## FOR ATTORNEY GENERAL
## SEPTEMBER 9TH!

លោកស្រីម៉ូរ៉ានឹងខិតខំតស៊ូដើម្បីជួយលោកអ្នក !
លោកស្រីធ្លាប់មានការពិសោធន៍ក្នុងតារតស៊ូ ដើម្បីសិទ្ធមនុស្ស,
ការពារសិទ្ធិអ្នកប្រើប្រាស់ទំនិញ, នឹងប្រឆាំងការប្រកាន់ពូជសាសន៍




**១-ការពារយ៉ាងមាំចំពោះសិទ្ធកម្មករទូទៅម៉ូរ៉ានឹងការពារសិទ្ធ**
របស់គ្រប់និយោជិកនឹងធ្វើការស៊ើបអង្កេតហើយចោទ
ប្រកាន់ដល់ក្រុមហ៊ុនណាដែលមិនគោរពសិទ្ធអ្នកធ្វើការ

**២-មិនអត់អោនឱ្យភាពប្រកាន់ពូជសាសន៍**
ម៉ូរ៉ានឹងធ្វើការចោទប្រកាន់ជនណាដែលប្រព្រឹត្តឧក្រិដ្ឋកម្ម
ដោយស្អប់ខ្ពើមការពារជនរងគ្រោះហើយខិតខំតស៊ូដើម្បី
បញ្ចប់សកម្មភាពរើងអើង

**៣-ផ្តល់យោបល់ជាអ្នកប្រើប្រាស់ទំនិញដល់គ្រប់ៗគ្នា**
ម៉ូរ៉ានឹងការពារអ្នកមានផ្ទះពីការរំលោភពីអ្នកឱ្យលុយខ្ចី ឬពី
អ្នកជួលផ្ទះឱ្យ-ពីអ្នកឱ្យខ្ចីប្រាក់ទៅរៀនមហាវិទ្យាល័យ
ដើម្បីយកចំណេញ-ខ្ចីប្រាក់មុនថ្ងៃបើកប្រាក់បៀវត្សនឹង
ក្រុមហ៊ុនដែលគ្រប់គ្រងមិនទៀងត្រង់ចំពោះពលរដ្ឋ

Learn more at:*maurahealey.com*

**កុំភ្លេចបោះឆ្នោតឱ្យ ម៉ូរ៉ានៅថ្ងៃ ៩ ខែកញ្ញា**
**លោកស្រីនឹងខិតខំពុះពារដើម្បីលោកអ្នក!**

# ជោគជ័យនៃគ្រួសារអាស៊ីអាគ្នេយ៍នៅអាមេរិក

**ទស្សនៈសង្គមដោយ : ពិន សំខុន**

**ឡូវែល:** បុណ្យដ៏ធំបង្អស់មួយរបស់សហគមន៍អាស៊ីអាគ្នេយ៍នៅឆ្នេរខាងកើតនៃស.រ.អា. ទើបនឹងបានកន្លងទៅប្រកបដោយជោគជ័យត្រចះត្រចង់នៅក្បែរទំនប់ទឹកធ្លាក់នៃដងទន្លេមេរីម៉ាក នៃទីក្រុងឡូវែល រដ្ឋម៉ាសាឈូសែតដោយសារពីធីបុណ្យអុំទូកប្រពៃណីខ្មែរនឹងពលរដ្ឋអាស៊ីរួមគ្នាទាំងអស់ដែលបានមករស់នៅដំបន់នេះ។ ទស្សនិកជនមិនតិចជាង៣-៤ម៉ឺននាក់ មកពីគ្រប់តំបន់នៃសហរដ្ឋអាមេរិក បានមកសំដែងការរីករាយអបអរសាទរនឹងកំសាន្ត ភ្លក់នូវរស់ជាតិវប្បធម៌អាស៊ីតែក្នុងរយៈពេល១ថ្ងៃដែលទើបនឹងរស់ឡើងវិញនៅទឹកដីសហរដ្ឋអាមេរិកនេះ ដូចគ្នានឹងកំណើតឆាយណាថោន







ក្រុងសេដ្ឋកិច្ចសហគមន៍ចិនដូច្នោះដែរ។

**ជោគជ័យ:** អុំទូកថ្ងៃទី១៦ សីហា ២០១៤ នេះ ពុំមែនជាលើកទី១ទេដែលខ្មែរ ឡាវ ថៃ ប្រារព្ធពិធីអុំទូករួមគ្នានេះ គឺជាលើកទី១៨ហើយ ដែលពិធីធ្វើទៅហើយមានការអបអរសាទរពីសាធារណជនគ្រប់ស្រទាប់ច្រើនពាន់ រហូតដល់ច្រើនម៉ឺននាក់តែគ្មានការណែនាំណាមួយពីថ្នាក់ដឹកនាំសហគមន៍រៀងៗខ្លួនឱ្យទទួលស្គាល់ជាសាធារណនឹងដោយការជឿជាក់ថា ជាជោគជ័យរបស់សហគមន៍អាស៊ីអាគ្នេយ៍រួមគ្នាទាំងមូលនោះទេ គេច្រើននិយាយថាជាបុណ្យរបស់ខ្មែរ ឬថាឡាវនឹងថៃយកវប្បធម៌ខ្មែរទៅប្រើប្រាស់ខូចអស់ហើយ។

ការពិតនៃព្រឹត្តិការណ៍បុណ្យអុំទូកនេះនាឆ្នាំ ២០១៤នេះ មានបញ្ចូលបន្ថែមសហគមន៍ភូមា នឹងវៀតណាមថែម២ទៀត រឹតតែកំណត់កាន់តែច្បាស់ឡើងថា សហគមន៍អាស៊ីបានចាប់បដិសន្ធិយ៉ាងពិតប្រាកដហើយ បើទោះជាខ្មែរនៅឡូវែលមានការចង្អៀតចង្អល់នឹងនិយាយវាចេញមកក៏ដោយតែផ្ទុយទៅវិញ ក្រុមយុវជនជំនាន់ក្រោយហាក់បីដូចជាពុំមានចង្អៀតចង្អល់នឹងទទួលយកវប្បធម៌ថ្មីនៃសហគមន៍អាស៊ានអាមេរិកាំងអ្វីឡើយ ។ ម្យ៉ាងវិញទៀត នៅតាមបណ្ដោយទន្លេមេរីម៉ាក នាថ្ងៃសៅរ៍ដ៏អស្ចារ្យនោះ ទាំងខ្មែរទាំងសាសន៍អាស៊ីដ៏ទៃឯទៀត នាំគ្នាខំប្រឹងលក់នឹងទិញផលិតផលសំរាំងនៃវប្បធម៌របស់ខ្លួនម្នាក់ៗ យ៉ាងប្រច្រៀតគ្នា ដោយគ្មានប្រកាន់ដោយចូលចិត្តនឹងដោយមេត្រីភាព ។ ខុសគ្នានឹងបារាំងអាណានិគម ហើយនឹងហូជីមិញមេកុម្មុយនីស្តវៀតណាមដែលខិតខំប្រឹងបង្កើតសហព័ន្ធឥណ្ឌូចិនឡើង សហគមន៍អាស៊ីអាគ្នេយ៍នៅឡូវែលបានផុសចេញមកដោយសេរីដោយខ្លួនឯងយ៉ាងងាយស្រួលចេញពីការរួមកម្លាំងគ្នាធ្វើសកម្មភាពលើដំកើងវប្បធម៌ជាតិរៀងៗខ្លួន។

**ទស្សនៈវិស័យ:** មកទល់នឹងពេលនេះ សហគមន៍អន្តោប្រវេសន៍អាស៊ីដ៏លេចធ្លោជាងគេនៅស.រ.អា.នេះ គឺឆាយណាថោននៅស្ទើរតែគ្រប់ទីកន្លែងនៃក្រុងធំៗអាមេរិកាំងជាមួយពលរដ្ឋសេដ្ឋកិច្ចរឹងមាំនឹងវប្បធម៌មហាកំពែងចិន -បន្ទាប់មកមានលិធីលសាយគួននៅកាលីហ្វ័រញ៉ា នៅវិស៊ូញ៉ាជាមួយពលរដ្ឋសេដ្ឋកិច្ចនឹងវប្បធម៌អនុស្សាវរីយសង្រ្គាមវៀតណាម-

រីឯខែមបូឌាថោនងើបឡើងបន្ទាប់ពីក្រោយនៅឡុងប៊ិចនឹងឡូវែលជាមួយវប្បធម៌អង្គរនឹងផ្សារគ្រួសារឯកទេសអាស៊ីអាគ្នេយ៍។ ផ្សារចិន ផ្សារយួន ផ្សារខ្មែរ សុទ្ធតែកសាងឡើងតម្រូវនឹងតំបន់ដែលមានប្រជាពលរដ្ឋខ្លួនឯងច្រើនផងនឹងតម្រូវភ្ញៀវឯទៀតគ្រប់សាសន៍ផង។ វិនិយោគនៅតំបន់ខ្លួនឯង ប្រើធនធានមនុស្សជាតិសាសន៍ខ្លួនឯងបានជាជំនួយដល់សេដ្ឋកិច្ច ជីវភាព នឹងដល់សង្គម ជាពិសេសជជំនួយដល់តំបន់ខ្លាំងណាស់ ដូចជានៅឡូវែលនេះ តំបន់ពាណិជ្ជកម្មខ្មែរមានភាពអ៊ូអរជាងតំបន់កណ្ដាលក្រុងទៅទៀត ។ ភាពអ៊ូអរនៃបុណ្យអុំទូកអាស៊ីអាគ្នេយ៍នៅឡូវែលនេះ អាចនាំឱ្យយើងស្រម័យបានថា នឹងអាចបង្កើតភាពអ៊ូអរនេះសម្រាប់៣៦៥ថ្ងៃបានដែរ ឱ្យតែយើងស្រុះស្រួលគ្នា ដូចដែលយើងបានធ្វើនាឱកាសអុំទូកដែលទើបកន្លងទៅថ្មីៗនេះបាន ។ ពេលនោះផ្សារអាស៊ីអគ្នេយ៍ក្នុងក្ដីស្រម័យនឹងមានការប្រជែងយ៉ាងខ្លាំងជាមួយឆាយណាថោននៅបូស្តុនជាប្រាកដ។

**ចក្ខុវិស័យ:** យើងអាចនឹងមិនរង់ចាំ៣០ឆ្នាំទៅមុខទៀត នឹងបង្កើតផ្សារអាស៊ីអគ្នេយ៍នោះទេ ពីព្រោះយើងចេះមានជំនះលើទំនាស់ពូជសាសន៍លើអវិជ្ជាចេះមានជំនឿលើមិត្តភាពចេះគោរពច្បាប់ទម្លាប់ដែលផ្តល់ភាពរុងរឿងដល់យើង។ កូនចៅយើងនឹងឃើញ ថ្វីដៃនៃមាតាបិតា ជីតាជីដូនក្នុងការថែររក្សាកេរ្តិ៍ដំណែលវប្បធម៌ដ៏រុងរឿងរបស់បុព្វបុរសបាន ដោយមិនចាំបាច់បែកគ្នាឬវាយគ្នា។

អំណោយផលដ៏ល្អបំផុតនោះ គឺសហគមន៍ទាំងមូលដែលនជុំវិញយើងសុទ្ធតែលើកទឹកចិត្តឱ្យយើងរួបរួមគ្នាទាំងអស់ចង់ឃើញយើង ដុះស្លាបចេះហោះរដៅយខ្លួនឯងទាំងអស់គ្នាបាន។ យើងត្រូវតែហ៊ានស្រម័យ ចំពោះគំនិតថ្មីដែលមិនទាន់កើតជាក់ស្តែងនៅឡើយ តែបើហ៊ានគិតដល់ គឺជាលទ្ធភាពសម្រាប់ឡូវែលនឹងក្លាយជាកំពូលថ្មីដ៏សំខាន់មួយទៀត មិនដែលមានពីមុនមកនៅស.រ.អា.នេះទេ។ ពេលនោះ ខ្មែរ យួន ឡាវ ថៃ ភូមា នឹងចាប់ដៃគ្នារកស៊ីបង្កើតជាតំបន់អាស៊ីអាគ្នេយ៍ដ៏ធំមួយដែលគ្រប់សាសន៍អាចមកទិញរបស់របរប្រើប្រាស់ សិល្បៈ ម្ហូបចំណីសំលៀកបំពាក់...។ល។ តាមត្រូវការណ៍ដូចជាកាលពីបុណ្យអុំទូកដែរ ៕

Continued from Page 05

## PRIMARY ELECTION ON....

unopposed for re-election.

Middlesex County District Attorney -the chief prosecutor for Middlesex County; supervises all lawyers who represent the state in criminal cases. The current District Attorney, **Marianne Ryan**, is running for re-election. She is being challenged by Michael Sullivan who is the current Middlesex County Clerk of Courts.

State Senate - **Eileen Donoghue** - unopposed

State Representative - 18th Middlesex District - The former state representative for this district, Kevin Murphy, became Lowell City Manager earlier this year. Candidates running for state representative are **Brian Donovan, Jim Leary, Rady Mom, Dave Ouellette and Paul RathaYem.**

For the Republicans:

US Senate - Brian Herr

Congress - Ann Wofford



២- ម៉ូរ៉ា ហេរ្យលី (Maura Healey)

Governor - Charlie Baker or Mark Fisher

Lieutenant Governor - KarynPolito

Treasurer - Mike Heffernan

Attorney General - John Miller

Secretary of State - Dave D'Arcangelo

State Auditor -Patricia Saint Aubin

There are no Republican candidates in either the 1st Middlesex State Senate or the 18th Middlesex State Representative races.

# ផ្ដើមសម្ដែងរដូវ២០១៤_១៥ជាមួយរឿងឆ្នាំសូន្យ

**ស្វែងយល់ពីបទពិសោធន៏ខ្មែរ-អាមេរិកាំង ១១ កញ្ញា - ៥តុលា**

**ឡូវែល:** រោងល្ខោន MRT នឹងផ្ដើមសម្ដែងរដូវ២០១៤-១៥ ជាមួយរឿងថ្មីមួយឈ្មោះឆ្នាំសូន្យសរសេរដោយ MICHAEL Golamco នឹងដឹករឿងដោយ Kyle Fabel ។ រឿងកំប្លែង នាដកម្មផ្ដោតទៅលើ វុឌ្ឍី អាយុ១៦ឆ្នាំខ្មែរ



អាមេរិកាំងរស់នៅឡុនប៊ិច កាលីហ្វ័រញ៉ា នាអំឡុងឆ្នាំ២០០០។ បន្ទាប់ពីម្ដាយគេស្លាប់ទៅយុវជនជំនាន់ទី១នេះ ប្រឈមមុខនឹងការគ្មានលំហរបស់ខ្លួនក្នុងសហគមន៏ដែលមិនមាននរណាទទួលបាន ហើយគ្រួសារមួយក៏ហាក់ដូចជារលាយបាត់ទៅដែរ។ ល្ខោននេះនឹងសម្ដែងពីថ្ងៃទី១១កញ្ញា ដល់ទី៤តុលា ហើយបន្ទាប់មកនឹងយកទៅសម្ដែងនៅរោងល្ខោន The Nancy L.Donahue នៅ ៥0 East Merrimack street នៅកណ្ដាលក្រុងប្រវត្តិសាស្ត្រឡូវែល ។

បើយោងតាមសម្ដី Charles Towers នាយកខាងសិល្បៈ "លំនាំរឿងនេះនឹងប៉ះអារម្មណ៏នៅឡូវែលទីក្រុងទី២ដែលមានខ្មែរអាមេរិកាំងរស់នៅច្រើនជាងគេនៅកាលីហ្វ័រញ៉ាជាទីក្រុងទី១"។ ក៏ប៉ុន្ដែ"ឆ្នាំសូន្យ"ជាសម្រែកនៃអតីតកាលរបស់យើងទាំងអស់គ្នាដែលជាកូននៃជនអន្តោប្រវេសន៏មិនថា យើងមកដល់ស.រ.អា ពេលណាឬក៏មកពីប្រទេសណាក៏ដោយ ។

រឿងល្ខោននេះបង្ហាញពីឱកាសដ៏ល្អវិសេសមួយសម្រាប់ MRT ចុលមកជួបសហគមន៏ខ្មែរ-អាមេរិកាំងដ៏ធំមួយនៅឡូវែលក្រុមហ៊ុនយើងធ្លាប់ធ្វើការជាមួយគណកម្មកាពិគ្រោះវប្បធមិតាំងពីដើមដំបូងដែលរឿងឆ្នាំសូន្យបានត្រូវជ្រើសរើសសម្រាប់រដូវ២០១៤-១៥នាឆ្នាំមុនម្ល៉េះ។ ក្រុមនោះ បានធ្វើការយ៉ាងជិតស្និតជាមួយក្រុមផលិតកម្មនឹងរដ្ឋបាល ដើម្បីផ្ដល់នូវទិសដៅវប្បធមិនឹងផ្សារភ្ជាប់ទៅនឹងសហគមន៏។

បើតាមសមាជិកគណកម្មការម្នាក់ សុចិន្ដា អ៊ុច "...គ្រួសារខ្មែរស្ទើរតែទាំងអស់នៅឡូវែលគឺជាសាក្សីនៃការសម្លាប់រង្គាល ហើយក៏ជាជនភៀសខ្លួននៃពិភពមួយដែលគេបង្ខំឱ្យចាប់ផ្ដើមជីវិតសាឡើងវិញ ត្រឡប់ទៅឆ្នាំសូន្យ..."តួទាំងអស់ចូលមកសម្ដែងនៅ Merrimack RT ជាតួថ្មី មកពីញូយ៉ក ពីឡូសអង់ជឺឡេស មកសម្ដែងនៅឡូវែល Daniel Velasco សម្ដែងតួ វុឌ្ឍី បងស្រី វុឌ្ឍី ឈ្មោះវ៉ា Juliette Hing-Lee អ្នកជិតខាង ឈ្មោះ ហាន ដោយ Michael Rosete ហើយនឹងមិត្តប្រុស វ៉ា ឈ្មោះ គ្លេន Arthur Keng ។

សំបុត្រចូលមើលតម្លៃ$៦០-២០ដែលគេអាចទិញតាមអិនធឺណេត www.MRT.org ឬទិញតាមទូរស័ព្ទ៩៧៨-៦៥៤-៤៦៧៨ ៕

# MERRIMACK REPERTORY THEATRE OPENS 2014-15 SEASON WITH

**"YEAR ZERO"**
**Exploring the Cambodian-American Experience**

**September 11 - October 5**

**Lowell, MA**- Merrimack Repertory Theatre will **Continued to Page 20**

MRT MERRIMACK REPERTORY THEATRE

SEPTEMBER 11 – OCTOBER 5, 2014

YEAR ZERO

by Michael Golamco

A Play About the Cambodian-American Experience

DIVIDED BETWEEN TWO WORLDS.

All teenagers need someone to talk to. Vuthy has chosen a skull. He is a young Cambodian-American struggling to find his place – in a community that doesn't truly accept him and in a family that seems to be disappearing.

A comedic drama about finding a direction and a home.

Tickets: mrt.org | 978-654-4678 | 50 E. Merrimack Street, Lowell MA

Supported in part by an award from the National Endowment for the Arts. Art Works.
Production Sponsor: Enterprise Bank. Media Sponsor: KhmerPost USA.



# ផ្លាស់ប្តូរអាស័យដ្ឋានបោះឆ្នោតនៅឡូវែល

# Change of Voting Locations in Lowell

By Richard Howe, Jr.

គណៈកម្មការរៀបចំការបោះឆ្នោតនៅឡូវែលបានធ្វើការផ្លាស់ប្តូរអាស័យដ្ឋាននៃទីកន្លែងដែលត្រូវបោះឆ្នោតសម្រាប់ទីតាំងចំនួន ១២ ដែលមានក្នុងសេចក្តីពិស្តារខាងក្រោម។ ការផ្លាស់ប្តូរទីតាំងបោះឆ្នោតនេះ ធ្វើឡើងសម្រាប់ការបោះឆ្នោតថ្នាក់រដ្ឋជាបឋម ដែលនឹងប្រព្រឹត្តទៅនៅថ្ងៃអង្គារ ទី៩ កញ្ញា ២០១៤ និងសម្រាប់ការបោះឆ្នោតនៅថ្ងៃអង្គារទី៤ ខែវិច្ឆិកា ឆ្នាំ២០១៤ ព្រមទាំងសម្រាប់ការបោះឆ្នោតនាឆ្នាំខាងមុខ។ ខាងក្រោមនេះ គឺជាបញ្ជីឈ្មោះទីកន្លែងបោះឆ្នោតចាស់ និងថ្មី។

The Lowell Election Commission has changed the location of many of the voting places in Lowell. The new places will be used for the State Primary Election on Tuesday, September 9, 2014; at the State Election on Tuesday, November 4, 2014 and at all elections in future years. Here is a list of each voting precinct in the city with the old voting place and the new voting place.

**ខណ្ឌទី១, សង្កាត់ទី ១**

Ward 1, Precinct 1 ទីតាំងចាស់ Old: Firehouse on High Stទីតាំងថ្មី New: Father Norton Manor, Lowell Housing Authority, 137 High St

**ខណ្ឌទី១, សង្កាត់ទី ២**

Ward 1, Precinct 2 ទីតាំងចាស់ Old: Reilly School on Douglas Rd - no change

**ខណ្ឌទី១, សង្កាត់ទី៣**

Ward 1, Precinct 3 ទីតាំងចាស់ Old: Reilly School on Douglas Rd – no change

**ខណ្ឌទី២, សង្កាត់ទី ១**

Ward 2, Precinct 1 ទីតាំងចាស់ Old: Tsongas CenterTItaMgfµI New: Pollard Memorial Library at 401 Merrimack St

**ខណ្ឌទី២, សង្កាត់ទី ២**

Ward 2, Precinct 2 ទីតាំងចាស់ Old: Tsongas CenterTItaMgfµI New: Lowell Telecommunications Corp, 246 Market St

**ខណ្ឌទី១, សង្កាត់ទី ៣**

Ward 2, Precinct 3 ទីតាំងចាស់ Old: Tsongas Center ទីតាំងថ្មី New: New: Lowell Telecommunications Corp, 246 Market St

**ខណ្ឌទី៣, សង្កាត់ទី ១**

Ward 3, Precinct 1 ទីតាំងចាស់ Old: Bailey School on Campbell Dr – no change

**ខណ្ឌទី៣, សង្កាត់ទី ២**

Ward 3, Precinct ២ទីតាំងចាស់ Old: Bailey School on Campbell Dr – no change

**ខណ្ឌទី៣, សង្កាត់ទី ៣**

Ward 3, Precinct 3 ទីតាំងចាស់ Old: Morey School on Pine St – no change

**ខណ្ឌទី៤, សង្កាត់ទី១**

Ward 4, Precinct 1 ទីតាំងចាស់ Old: Morey School on Pine St – no change

**ខណ្ឌទី៤, សង្កាត់ទី ២**

Ward 4, Precinct 2 ទីតាំងចាស់ Old: VFW on Plain St ទីតាំងថ្មី New: Flanagan Development, Lowell Housing Authority, 580 Chelmsford St

**ខណ្ឌទី៤, សង្កាត់ទី៣**

Ward 4, Precinct 3 ទីតាំងចាស់ Old: Rogers School on Highland St – no change

**ខណ្ឌទី៥, សង្កាត់ទី១**

Ward 5, Precinct 1 ទីតាំងចាស់ Old: McAvinnue School on Mammoth Rd – no change ខណ្ឌទី៥, សង្កាត់ទី ២

Ward 5, Precinct 2 ទីតាំងចាស់ Old: Polish American Veterans Hall on Coburn StTItaMgfµI New: Fr Morrissette Manor, Lowell Housing Authority, 111 Hildreth St

**ខណ្ឌទី៥, សង្កាត់ទី៣**

Ward 5, Precinct 3 ទីតាំងចាស់ Old: Greenhalge School on Ennell St – no change

តទៅទំព័រទី ១០

Elect

Jim Leary

State Representative

18th Middlesex District

My name is Jim Leary. For the past 8 years I've been fortunate to represent you on the Lowell School Committee. I am now asking for the opportunity to represent you on Beacon Hill as your State Representative. I will fight for economic development, high quality schools and keeping Lowell safe.

ខ្ញុំឈ្មោះ ជីម លេរី អស់រយៈពេល៨ឆ្នាំមកហើយ ដែល ខ្ញុំមានសំណាង និងបានជាតំណាងលោកអ្នកនៅ គណកម្មការ សាលារៀនឡូវែល ។

នាពេលនេះទៀត ខ្ញុំសុំឱ្យលោកអ្នកផ្តល់ឱកាសឱ្យខ្ញុំអាចក្លាយជាតំណាងលោកអ្នកនៅប៊ីខិន ហៀល ជាតំណាងរដ្ឋរបស់លោកអ្នក ។ ខ្ញុំនឹងខិតខំប្រយុទ្ធដើម្បីអភិវឌ្ឍន៍ សេដ្ឋកិច្ច គុណភាពខ្ពស់របស់សាលារៀន ហើយរក្សាឡូវែលឱ្យមានសន្តិសុខ ។



On September 9th, I respectfully ask for your vote.

## តមកពីទំព័រទី ០៩ ផ្លាស់ប្តូរអាស័យដ្ឋានបោះឆ្នោតនៅ...

**ណ្ឌទី៦, សង្កាត់ទី១**

Ward 6, Precinct 1 ទីតាំងចាស់ Old: McAvinnue School on Mammoth Rd – no change

**ខណ្ឌទី៦, សង្កាត់ទី២**

Ward 6, Precinct 2 ទីតាំងចាស់ Old: Pawtucketville Memorial School ទីតាំងថ្មី New: Bruyere Gardens at D'Youville, 975 Varnum Ave

**ខណ្ឌទី៦, សង្កាត់ទី៣**

Ward 6, Precinct 3 ទីតាំងចាស់ Old: Elks Club on Old Ferry Rd ទីតាំងថ្មី New: Bruyere Gardens at D'Youville, 975 Varnum Ave

**ខណ្ឌទី៧, សង្កាត់ទី១**

Ward 7, Precinct 1 ទីតាំងចាស់ Old: Senior Center on Broadway – no change

**ខណ្ឌទី៧, សង្កាត់ទី២**

Ward 7, Precinct 2 ទីតាំងចាស់ Old: Senior Center on Broadway – no change

**ខណ្ឌទី៧, សង្កាត់ទី៣**

Ward 7, Precinct 3 ទីតាំងចាស់ Old: Senior Center on Broadway – no change

ខណ្ឌទី៨, សង្កាត់ទី១

Ward 8, Precinct 1 ទីតាំងចាស់ Old: Firehouse at Pine & Stevens ទីតាំងថ្មី New: Lowell Health Dept, 341 Pine St

**ខណ្ឌទី៨, សង្កាត់ទី ២**

Ward 8, Precinct 2 ទីតាំងចាស់ Old: Daley School on Fleming St – no change




**ខណ្ឌទី៨, សង្កាត់ទី៣**

Ward 8, Precinct 3 ទីតាំងចាស់ Old: Daley School on Fleming St – no change

**ខណ្ឌទី៩, សង្កាត់ទី១**

Ward 9, Precinct 1 ទីតាំងចាស់ Old: Polish American Veterans Hall on Coburn St ទីតាំងថ្មី New: Fr Morrissette Manor, Lowell Housing Authority, 111 Hildreth St

**ខណ្ឌទី៩, សង្កាត់ទី ២**

Ward 9, Precinct 2 ទីតាំងចាស់ Old: Robinson School on June St – no change

**ខណ្ឌទី៩, សង្កាត់ទី ៣**

Ward 9, Precinct 3 ទីតាំងចាស់ Old: Robinson School on June St – no change

**ខណ្ឌទី១០, សង្កាត់ទី ១**

Ward 10, Precinct 1 ទីតាំងចាស់ Old: VFW on Plain StNew: Christian Church of Restoration, 53 Blossom St

**ខណ្ឌទី១០,សង្កាត់ទី ២**

Ward 10, Precinct 2 ទីតាំងចាស់ Old: Firehouse on Lawrence St ទីតាំងថ្មី New: Faulkner St Apartments, Lowell Housing Authority

Ward 10, Precinct 3 ទីតាំងចាស់ Old: St Anthony's Parish Hall on Central St – no change

**ខណ្ឌទី១១, សង្កាត់ទី១**

Ward 11, Precinct 1 ទីតាំងចាស់ Old: Shaughnessy School on Gorham St – no change

**ខណ្ឌទី១១, សង្កាត់ទី ២**

Ward 11, Precinct 2 ទីតាំងចាស់ Old: J.G. Pyne School on Boylston St – no change ខណ្ឌទី១១, សង្កាត់ទី ៣

Ward 11, Precinct 3 ទីតាំងចាស់ Old: J.G. Pyne School on Boylston St – no change

MARCOTTE LAW FIRM
ក្រុមហ៊ុនមេធាវី Marcotte
45 MERRIMACK STREET
LOWELL, MASSACHUSETTS
(978) 458-1229
•សេចក្តីអន្តរាយដល់បុគ្គល •ច្បាប់ធានារ៉ាប់រង
•សំណងបុគ្គល •ការរំលោភបទព្រហ្មទណ្ឌ
•ពិការភាពដោយសន្តិសុខសង្គម •គ្រោះថ្នាក់ចរាចរណ៍
•បទព្រហ្មទណ្ឌផ្លូវភេទ និងថ្នាំញៀន •គ្រោះថ្នាក់នៅការដ្ឋាន
•ច្បាប់គ្រួសារ និងផែនការអចលនទ្រព្យ •បំណុលអចលទ្រព្យ
•បណ្តឹងវិវាទទូទៅ
•បើកបរនៅពេលស្រវឹង និងប្រព្រឹត្តបទល្មើសពេលធ្វើចរាចរណ៍
មានបុគ្គលិកនិយាយភាសាខ្មែរលោកអ្នកអាចហៅទូរស័ព្ទ
មកក្រុមហ៊ុនយើងខ្ញុំដើម្បីពិគ្រោះ
(978) 458-1229
www.marcottelawfirm.com



ការិយាល័យ មេធាវី
ថូមាស ស្តាលីយ៉ាណូស
Law Office of Thomas Stylianos Jr.
287 Appleton St. Lowell MA 01852
• Immigration •អន្តោប្រវេសន៍
• Auto Crash •គ្រោះថ្នាក់រថយន្ត
• Divorce •លែងលះប្តីប្រពន្ធ
សូមទាក់ទង សោភា ឬ ធំ 978-459-5000 or 800-308-3766

# មានមេធាវីខ្មែរថ្មីនៅឡូវែល

**ដោយខ្មែរផុស ស.រ.អា.**

លោក អែនជ្រូ តាំង ទើបនឹងបើកទីតាំងបំរើការណ៍ផ្នែកច្បាប់ក្នុងក្រុងដែលមានខ្មែរច្រើនរស់នៅនាទីក្រុងឡូវែល ។

លោកជាមេធាវីខ្មែរនិយាយភាសាខ្មែរជ្រៅជ្រះទី៤ដែលមានអាជ្ញាប័ណ្ណកំពុងបំរើសហគមន៍មួយដែលសម្បូរអ្នកត្រូវការអ្នកឯកទេសការពារប្រជាពលរដ្ឋនៅចំពោះមុខច្បាប់អាមេរិកាំង។ លោកនិយាយថា លោកបានរៀនចប់មហាវិទ្យាល័យច្បាប់ស្រុកខ្មែរតាំងពីមកដល់នាឆ្នាំ២០០៥ លោកនៅបំរើជាជំនួយការ៨ឆ្នាំ នៅការិយាល័យច្បាប់លោក ឡូវីស ហេស្កល់ នៅទីនោះលោកធ្វើការផងរៀនផង រហូតដល់បានបញ្ចប់សញ្ញាប័ត្រច្បាប់សហរដ្ឋអាមេរិកនឹងប្រឡងយកអាជ្ញាប័ណ្ណពីសមាគមមេធាវីបាន កាលពីចុងឆ្នាំមុននេះ ទៀតផង។ សព្វថ្ងៃលោកកាន់ករណីរដ្ឋបវេណីចំនួន១០០ដែលធ្វើពីដោះស្រាយទំនាស់ជីធ្លីគ្រោះថ្នាក់ចរាចរ ការបណ្តេញចេញពីស្រុក...។ល។ តែមិនធ្វើករណីឧក្រិដ្ឋទេ ។

លោក អែន ជ្រូ បាននិយាយថា គឺជាការងារដែលលោកចូលចិត្តជួយដោះស្រាយបញ្ហាផ្លូវច្បាប់ដោយនិយាយជាភាសាខ្មែរជាមួយនឹងខ្មែរ បើទោះជាមានប្រើសេវាអ្នកបកប្រែក៏ដោយ ក៏មិនដូចចិត្តអ្នកនិយាយភាសាខ្មែរដូចគ្នាដែរ លោកបន្តថា បើខ្មែរយើងមកពីគ្រោះយោបល់


Andrew Taing, Attorney at Law

ពីដំណោះស្រាយផ្លូវច្បាប់លោករីករាយនឹងជួយដោយមិនយកកំរៃទេ។

ខ្មែរដែលមានឯកទេសជាអ្នកការពារច្បាប់ មិនសូវមានទេ សម្បូរតែអ្នករត់ការណ៍ដោយ



1550 Middlesex Street Lowell, MA 01851

សារតែការអប់រំពីកុមារភាពគឺ គេចចេញពីបណ្តាញច្បាប់ឬក្បួនតម្រាមិនប្រឈមមុខទេ ដូចជាប្រដៅកូនចៅថា កុំឈ្លោះនឹងស្រីកុំក្តីនឹងចិនជាដើម ។ វិជ្ជាជីវៈរបស់លោក អែន ជ្រូ នឹងភាពសម្បូរនិស្សិតសាលាច្បាប់នៅស្រុកខ្មែរបច្ចុប្បន្ននិស្សិតស្រីក៏សម្បូរណាស់ដែរ គឺជាសញ្ញាច្បាស់លាស់មួយនៃការប្តូរចរន្តគំនិតពីខ្មែរស៊ុតទ្រុឌមិនចោលចែចូវនោះហើយ ៕


# ការិយាល័យច្បាប់ ហ្វ្រង់ស៊ីស្កូ ជេ.រូសា


Francisco J. Rosa, Esq.
មេធាវី ហ្វ្រង់ ស៊ីស្កូ ជេ.រូសា


Andrew ´Bunna´ Taing, Esq.
មេធាវី ប៊ុណ្ណា អែនជ្រូ តាំង

Law Office of:
FRANCISCO J. ROSA
ATTORNEY AT LAW

| SERVICES | តំណាងក្តីដូចខាងក្រោម |
| --- | --- |
| Auto Accidents/ Personal Injury | គ្រោះថ្នាក់រថយន្ត/ របួសរូបរាងកាយ |
| Bankruptcy | ក្ស័យធន |
| Immigration | អន្តោប្រវេសន៍ |
| Consumer Protection | ការពារអតិថិជន |
| Real Estate Closings/Disputes | ទំនាស់ផ្នែកអចលនវត្ថុ |
| Divorces Child Custody | លែងលះ និងអាណាព្យាបាលកិច្ច |

1550 Middlesex Street Lowell, MA 01851
Phone: **978-458-0934** | help@attorneyrosa.com
www.attorneyrosa.com

# Red Rose

ភោជនីយដ្ឋាន **RESTAURANT**
ក្លាបក្រហម **ម្ចាស់ថ្មី -ម្ហូបឈ្ងុយឆ្ងាញ់**

**Pailin Plaza**
**716 Middlesex St. Ste 1**
**Lowell, MA 01851**

អញ្ជើញមកចូលរួមមិនខុសបំណងទេ សូមអរគុណ!

**Mon-Sun**
**8am -8pm**




* ម្ហូបឆ្ងាញ់ជាងមុន តែតម្លៃនៅថោក ដូចមុនដដែល
* សេវាកម្មរហ័សទាន់ចិត្ត និងរួសរាយរាក់ទាក់

**(978) 452-5400**










ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងថ្មីប្រែសម្រួលពីភាសាអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃ អង្គារ៍ ទី២៥ ខែសីហា ឆ្នាំ២០១៤

# ក្រសួងមហាផ្ទៃខាងអន្តោប្រវេសន៍បានចាប់ផ្តើម "ធ្វើជំរឿន"

**ដំណើរក្នុងសហគមន៍វៀតណាមដោយ :ឃី សុវុឌ្ឍី ៣ ខែសីហា ២៥ ២០១៤**

អគ្គនាយកដ្ឋានក្រសួងមហាផ្ទៃខាងអន្តោប្រវេសន៍បានចាប់ផ្តើម "ធ្វើជំរឿន"របស់ខ្លួនប្រជាជនជាតិភាគតិចវៀតណាមដែលរស់នៅក្នុងប្រទេសកម្ពុជាកាលពីថ្ងៃអាទិត្យជាមួយនឹងលោក សុខ ផល ប្រធានអគ្គនាយកដ្ឋាននេះបានធ្វើដំណើរតាមភូមិនៅតាមបណ្តោយបឹងទន្លេសាបនាខេត្តពោធិសាត់។នាយប៉ូលិសខេត្តពោធិ៍សាត់ សារុន ចន្ធី បានថ្លែងថាអគ្គនាយក សុខ ផល និងក្រុមមន្ត្រីមកពីនាយកដ្ឋានអន្តោប្រវេសន៍នេះបានទៅពិនិត្យមើលស្ថានភាពរស់នៅរបស់សហគមន៍ជនជាតិវៀតណាមដែលរស់នៅលើបឹងនេះ។ លោក ចន្ធី បានថ្លែងថា: គាត់គ្រាន់តែបានទៅនៅពេលព្រឹកដើម្បីមើលស្ថានភាពនៃជនជាតិវៀតណាមដែលរស់នៅលើទន្លេសាបនេះ "លោកបានបន្ថែមថាឧត្តមសេនីយ៍ផលបានទស្សនាសំខាន់ឃុំកំពង់ហ្លួង ស្រុកក្រគរ។

លោក ចន្ធី បានពន្យល់ថាការធ្វើជំរឿននេះត្រូវបានអនុវត្តដោយឧត្តមសេនីយ៍ផលរួមគ្នាជាមួយនឹងក្រុមប៉ូលីសខេត្តនៅទូទាំងប្រទេស ។ លោកថ្លែងថា: យើងកំពុងធ្វើវាសម្រាប់ប្រទេសទាំងមូលមិនត្រឹមតែធ្វើនៅក្នុងខេត្តពោធិ៍សាត់ទេ។ លោក ចន្ធី បានថ្លែងថា: គ្រាន់តែយើងនឹងធ្វើជំរឿនរបស់យើងឱ្យទាន់សម័យធ្វើដើម្បីមើលថាតើពួកគេបានរស់នៅដោយស្របច្បាប់ ឬខុសច្បាប់។ ទីម សារិន អភិបាលស្រុកក្រគរបានឱ្យដឹងថា ជំរឿនលើកមុនបានបង្ហាញថា ជនជាតិភាគតិចវៀតណាមនៅក្នុងប្រទេសកម្ពុជាមានគុណភាពរស់នៅស្រដៀងគ្នានៃជីវិតទៅនឹងពួកខ្មែរដែរ ។ លោក សារិន បានឱ្យដឹងថា: ភាគច្រើននៃពួកគេចូលចិត្តទៅរស់នៅលើទឹកហើយពួកគេបានធ្វើការនៅក្នុងវិស័យអាជីវកម្មផ្សេងគ្នាដូចជាការនេសាទត្រី, ការលក់ដូរខ្នាតតូច និងការងារផ្សេងទៀត។ ឧត្តមសេនីយ៍ផលបានឱ្យដឹងថាលោកមិនអាចផ្តល់ព័ត៌មានលម្អិតអំពីដំណើរទស្សនកិច្ចរបស់លោកទៅកាន់កំពង់ហ្លួងទេ ប៉ុន្តែបានបដិសេធថា គាត់បានទៅទីនោះ ដើម្បីមើលមនុស្សដែលជនជាតិយួន ។ខ្ញុំមិនបានសម្លឹងមើលទៅពួកគេ ប៉ុន្តែពួកគេមើលទៅក្រោយខ្ញុំទៅវិញ ។ឧត្តមសេនីយ៍ផលបានឱ្យដឹងថា សូមសួរប៉ូលីសខេត្តពោធិ៍សាត់លោកបានបដិសេធមិនធ្វើអត្ថាធិប្បាយបន្ថែមទៀត។

បន្ទាប់ពីការស្នើរសុំពីគណបក្សសង្គ្រោះជាតិ លោក ខៀវ សុភ័គ អ្នកនាំពាក្យក្រសួងមហាផ្ទៃបាននិយាយនៅក្នុងបទសម្ភាសមួយនៅថ្ងៃទី ៣០ ខែកក្កដាថាក្រសួងមហាផ្ទៃនឹងពិនិត្យឡើងវិញនូវច្បាប់អន្តោប្រវេសន៍និងផ្តល់ការប៉ាន់ស្មាននៃចំនួនប្រជាជនវៀតណាមដែលកំពុងរស់នៅក្នុងប្រទេសកម្ពុជា។ អនុប្រធានគណបក្សសង្គ្រោះជាតិលោក កឹម សុខា ប៉ុន្មានថ្ងៃមុនបានឱ្យដឹងថា គណបក្សប្រឆាំងនឹងស្វែងរកដើម្បីកំណត់ចំនួននៃជនបរទេសដែលរស់នៅក្នុងប្រទេសកម្ពុជាដោយស្របច្បាប់ ឬខុសច្បាប់នៅពេលដែលលោកបានចូលដល់មករដ្ឋសភា។ នេះមិនមែនជាលើកទីមួយទេ ថាការស្ទង់មតិនៃជនបរទេសមួយដែលត្រូវបានគេអនុវត្ត។ នៅឆ្នាំ២០១២ លោកចាន់ធីនៃខេត្តពោធិសាត់បានឱ្យដឹងថាជនជាតិវៀតណាមប្រហែល១០០០នាក់បានរស់នៅតាមបឹងនៅកំពង់ហ្លួង។ ទោះជាយ៉ាងណាឈួចាន់ឌឿអភិបាលខេត្តនៅជាប់គ្នាកំពង់ឆ្នាំងបាននិយាយថានៅទីនេះក៏មានមួយចំនួនធំនៃជនជាតិភាគតិចវៀតណាមនៅលើទន្លេសាបជំរឿននេះនឹងមានទំហំធំជាងធម្មតា ។នាយឧត្តមសេនីយ៍ផលបាននាំយកដៃរនូវវិធីសាស្ត្រចាប់តាំងពីត្រូវបានគេដាក់ឈ្មោះប្រធានអគ្គនាយកនៃអន្តោប្រវេសន៍ដែលត្រូវបានបង្កើតឡើងនៅក្នុងខែមករានេះលោក ចាន់ ឌឿ បាននិយាយថា "បន្ទាប់ពីក្រសួងមហាផ្ទៃបានបង្កើតនាយកដ្ឋានទូទៅនៃអន្តោប្រវេសន៍ខ្ញុំបានឮថាក្រសួងមហាផ្ទៃបានមានផែនការដើម្បីធ្វើជំរឿនឱ្យទាន់សម័យលើជនបរទេសរួមទាំងប្រជាជនវៀតណាម "គាត់បាននិយាយថា។ យើងតែងតែធ្វើជំរឿននេះជារៀងរាល់ខែ។ លោក ចាន់ ឌឿ បានបន្ថែមថា ខ្ញុំគិតថានេះមិនមែនជាគម្រោងការថ្មីមួយប៉ុន្តែខ្ញុំធ្វើជំរឿននេះនឹងមានច្រើនជាងនេះហើយបានលម្អិតជាងមុន"៕

sovuthy@cambodiadaily.com

# Foreigner Census Begins; Official Tours Vietnamese Communities

**By Khy Sovuthy | August 25, 2014**

The Interior Ministry's general department of immigration began its "census" of ethnic Vietnamese people living in Cambodia on Sunday, with Sok Phal, the department chief, touring Pursat province villages along the Tonle Sap lake.

Pursat provincial police chief Sarun Chanthy said that General Phal and a group of officials from the immigration department had gone to inspect the living situation of the Vietnamese communities living on the lake.

"He just went in the morning to see the situation of the Vietnamese nationals who have been living on the Tonle Sap," said Mr. Chanthy, adding that Gen. Phal had mainly toured Krakor district's Kompong Luong commune.

Mr. Chanthy explained that the census is being carried out by Gen. Phal together with provincial police across the country. "We're doing it for the whole country, it is not only being done in Pursat province," he said.

"We're just going to update our census, to see whether they live legally or illegally," Mr. Chanthy said.

Krakor district governor Tim Sarin said that previous censuses had revealed that ethnic Vietnamese living in Cambodia have a similar quality of life to that of Khmers.

"Most of them like to live on the water and they work in different business sectors such as fishing, small-scale selling and other jobs," Mr. Sarin said.

Gen. Phal said that he could not give details about his trip to Kompong Luong but appeared to deny that he had gone there to look at ethnic Vietnamese people.

"I didn't look at them but they looked back at me. Please ask the Pursat provincial police," Gen. Phal said. He declined to comment further.

After a request from the CNRP, Interior Ministry spokesman Khieu Sopheak said in an interview on July 30 that the Interior Ministry would review immigration laws and provide estimates of the number of Vietnamese people living in Cambodia.

CNRP Vice President Kem Sokha had the day before said that the opposition party would seek to determine the number of foreigners living in Cambodia legally or illegally once it entered the National Assembly.

This is not the first time that such a survey of foreigners has been carried out. One in 2012 revealed that about 1,000 Vietnamese nationals were living along the lake in Kompong Luong, said Mr. Chanthy of Pursat.

However, Chhuor Chandoeun, governor of the adjacent Kompong Chhnang province, which also has a large number of ethnic Vietnamese living on the Tonle Sap, said he understood this census would be bigger than normal.

Gen. Phal has taken a hands-on approach since being named the director of the general department of immigration, which was created in January, Mr. Chandoeun said.

"After the Interior Ministry created the general department of immigration, I heard that the Interior Ministry had plans to update the census on foreigners including Vietnamese people," he said.

"We always update this census each month. I think this is not a new plan, but I think this census will be more detailed than before," Mr. Chandoeun added.

**sovuthy@cambodiadaily.com**

# ការនាំចេញអង្ករបស់កម្ពុជាទៅតំបន់អឺរ៉ុបមានការកើនឡើង

**ដោយៈ ហួច ស៊ីលៀស AND កង សុធា | AUGUST 28, 2014**

ការនាំចូលអង្ករបស់សហភាពអឺរ៉ុបពីប្រទេសអភិវឌ្ឍន៍តិចតួចជាពិសេស គឺប្រទេសកម្ពុជានោះបានកើនឡើង៥១ភាគរយបើធៀបនឹងឆ្នាំមុន។ តួលេខនេះជាតួលេខមួយដែលទីភ្នាក់ងារស្រូវអង្ករជាតិអ៊ីតាលី ចាត់ទុកថា "ជាទិន្នន័យថ្មីមិនល្អ" នៅក្នុងការខិតខំប្រឹងប្រែងរបស់ខ្លួនដើម្បីដកចេញនូវការនាំចេញរួចពន្ធ។

យោងតាមទិន្នន័យចេញដោយគណៈកម្មការអឺរ៉ុប សហភាពអឺរ៉ុបបាននាំចូលអង្ករចំនួន២៥៤.៤៣៦តោន ពីប្រទេសកម្ពុជា និងពីប្រទេសភូមាចាប់ពីខែកញ្ញាឆ្នាំ២០១៣ដល់ខែកក្កដា ឆ្នាំនេះ បើធៀបនឹងរយៈពេលដូចគ្នាកាលពីឆ្នាំមុនដែលមានចំនួន១៦៨.៨៣២តោននោះ។ ចំណែកឯការនាំចេញរបស់ប្រទេសកម្ពុជាមានប្រមាណ៩៧ភាគរយ ពោលគឺស្មើនឹង២៤៦.៩៥៤តោន។

តួលេខនេះត្រូវបានបង្ហាញបន្ទាប់ពីមានការបិទច្រកនាំចូលសំខាន់ៗនៅក្នុងប្រទេសអូស្ត្រាលីដោយកសិករ និងសមាជិកនៃសហជីពកសិកម្មកាលពីខែមុន នៅក្នុងការតវ៉ាប្រឆាំងនឹងកិច្ចព្រមព្រៀង "អ្វីៗទាំងអស់លើកលែងតែសព្វាវុធ" របស់សហភាពអឺរ៉ុបដែលអនុញ្ញាតឱ្យអង្ករកម្ពុជាត្រូវបាននាំចេញដោយរួចពន្ធទៅកាន់ទីផ្សារអឺរ៉ុបនោះ។

លោក Roberto Carriere ប្រធានសមាគមរោងម៉ាស៊ីនកិនស្រូវអ៊ីតាលីបានលើកឡើងថា ទោះបីជាមានការគាំទ្រពីអ្នកនយោបាយអ៊ីតាលីក្រោយពីមានការតវ៉ាកាលពីខែកក្កដាក៏ដោយ ក៏ការនាំចូលអង្ករពីប្រទេសកម្ពុជាទំនង

តទៅទំព័រទី១៣

# សាគូ សាម៉ុត

# ប្រវត្តិសាស្ត្រកម្ពុជា និង ទរជនខ្មែរ

តពីលេខមុន

ភ្នំពេញ លោក អ៊ិន តាំ បានក្លាយជា ទីប្រឹក្សារដ្ឋាភិបាល និង បានចូលរួមធ្វើកិច្ចការផ្សេងៗ ដើម្បីរៀបចំ រដ្ឋធម្មនុញ្ញថ្មី ។

បន្ទាប់ពីមានដំណោះស្រាយនយោបាយនៅប៉ារីស ឆ្នាំ ១៩៩១ និង មានការបោះឆ្នោតសកល ក្រោមការត្រួតពិនិត្យរបស់ អ.ស.ប. ឆ្នាំ ១៩៩៣ លោក អ៊ិន តាំ បានបង្កើត "គណៈបក្សប្រជាធិបតេយ្យ" និង ឈរឈ្មោះជាបេក្ខជនតំណាងរាស្ត្រ នៅមណ្ឌលកំពង់-ចាម ស្រុកកំណើតរបស់គាត់ ។ តែ គណបក្សនេះ គ្មានបានអាសនៈនៅសភាទេ ។

បន្ទាប់ពីបរាជ័យដ៏ជូរចត់នេះមក គាត់ក៏បានដកខ្លួនពីនយោបាយ ហើយបានវិលត្រឡប់មករស់នៅស្រុកអាមេរិកវិញ ។ គាត់បានទទួលអនិច្ចកម្មនៅ ថ្ងៃទី ១ មេសា ឆ្នាំ ២០០៦ ក្នុងអាយុ ៨៤ ឆ្នាំ នៅ *CHANDLER* រដ្ឋ *ARIZONA* ។

សូមអានបន្ថែម កាលប្រវត្តិវិជ្ជា ឆ្នាំ ១៩៣៥ - ២០១២ ។


អ៊ិនតាំ




## អ៊ិន តាំ
(១៩២២ - ២០០៦)

លោក អ៊ិន តាំ កើតថ្ងៃទី ២២ កញ្ញា ១៩២២ នៅ ឃុំព្រែកកក់ ស្រុកស្ទឹងត្រង់ ខេត្តកំពង់ចាម ។ ពីឆ្នាំ ១៩២៨ ដល់ ១៩២៩ គាត់បានមករៀនភាសាបាលីនៅ វត្តស្ទឹងត្រង់ បន្ទាប់មកទៀត នៅវិទ្យាល័យ ស៊ីសុវត្ថិ មុននឹងចូល សាលារដ្ឋបាលខ្មែរ នៅឆ្នាំ ១៩៤២ ។ នៅឆ្នាំ ១៩៤៣ គាត់បានរៀបការជាមួយ នាង អ៊ិន គាត ។ នៅឆ្នាំដដែល ខែកក្កដា គាត់បានចូលបំរើ រដ្ឋបាលខ្មែរ ជាអ្នករាជការជាន់ទាប នៅខេត្ត ព្រៃវែង សៀមរាប កំពង់ចាម បន្ទាប់មក នៅតំបន់ខ្ពង់រាបខ្ពស់ ។ ពីឆ្នាំ ១៩៥៣ ដល់ឆ្នាំ ១៩៥៤ គាត់ជា អធិការប៉ូលីសខេត្តកំពង់ឆ្នាំង ។ ពីឆ្នាំ ១៩៥៦ ដល់ឆ្នាំ ១៩៥៨ គាត់ជា នាយកសាលាប៉ូលីសខេត្ត នៅកំពង់ឆ្នាំង ។

ពីឆ្នាំ ១៩៥៨ ដល់ឆ្នាំ ១៩៦៤ គាត់ជា អភិបាល ខេត្តតាកែវ និង មានមុខតំណែងត្រួតជា អគ្គបញ្ជាការ ក្រសួងការពារសន្តិសុខជាតិ និង នាយករាជបណ្ឌិតសភាប៉ូលីស ។

ពីថ្ងៃ ២៦ ធ្នូ ១៩៦៤ ដល់ ២៤ តុលា ១៩៦៦ គាត់ជា រដ្ឋមន្ត្រី ក្រសួង មហាផ្ទៃ និង សាសនា ។

នៅឆ្នាំ ១៩៦៦ គាត់បានជាប់ឆ្នោតជា តំណាងរាស្ត្រ មណ្ឌលក្រូចឆ្មារ ខេត្តកំពង់ចាម ។ នៅឆ្នាំ ១៩៦៧ សម្តេច សីហនុ បានតែងតាំងគាត់ជា អភិបាលខេត្តបាត់ដំបង ទទួលភារៈរក្សារបៀបរៀបរយឡើងវិញ នៅពេលមាន កុប្បកម្ម នៅសំឡូត ក្នុងរយៈពេល ១ ឆ្នាំ ដោយបានបោះបង់ជាបណ្តោះអាសន្ន តំណែងតំណាងរាស្ត្រ ។ ពីថ្ងៃទី ១ កុម្ភៈ ១៩៦៨ ដល់ថ្ងៃទី ១២ កក្កដា ១៩៦៨ គាត់ជា រដ្ឋមន្ត្រី ក្រសួងកសិកម្ម នៅក្នុងគណៈរដ្ឋមន្ត្រីរបស់លោក ប៉ែន នុត ។

នៅឆ្នាំ ១៩៦៩ ដោយមានការរំជើបរំជួល បណ្តាលឲ្យបាត់ខ្លួនតំណាងរាស្ត្រ ហ៊ុយ នឹម លោក អ៊ិន តាំ បានជាប់ឆ្នោតជា តំណាងរាស្ត្រ នៅជ្រៃវៀន ខេត្តកំពង់ចាម ជំនួស លោក ហ៊ុយ នឹម ។ នៅថ្ងៃ ២៦ កុម្ភៈ១៩៧០ គាត់ជា ប្រធានស្តីទី សភាជាតិ ។

ព្រឹត្តិការណ៍ឆ្នាំ ១៩៧០ ថ្ងៃទី ១៨ មីនា លោក អ៊ិន តាំ បានប្រើឥទ្ធិពលរបស់គាត់ ទៅលើតំណាងរាស្ត្រដទៃទៀត ឲ្យបោះឆ្នោតទម្លាក់ សម្តេច សីហនុ ពីប្រមុខរដ្ឋ ។ ពេលនេះ គាត់បានឡើងឋានៈជា ប្រធានសភាជាតិ ។

ពីថ្ងៃទី ៣ ឧសភា ១៩៧១ ដល់ថ្ងៃទី ១២ មីនា ១៩៧២ គាត់ជា ឧបនាយករដ្ឋមន្ត្រីទី២ ទទួលបន្ទុក ក្រសួង មហាផ្ទៃ នៃ របបសាធារណរដ្ឋខ្មែរ ។

នៅពេលបោះឆ្នោតជ្រើសរើស ប្រធានាធិបតី សាធារណរដ្ឋខ្មែរ ថ្ងៃទី ៤ មិថុនា ១៩៧២ បេក្ខជន អ៊ិន តាំ បានទទួល ២៤% នៅក្រោមបេក្ខជន លន់ នល់ (៥៥%) មិនបានជាប់ជាប្រធានាធិបតី ទេ ។ ប៉ុន្តែ លោក អ៊ិន តាំ ជាមន្ត្រីកំពូលក្នុងរបប សាធារណរដ្ឋ ៖ ពីថ្ងៃទី ១៥ ឧសភា ១៩៧៣ ដល់ថ្ងៃទី ៧ ធ្នូ១៩៧៣ ជា នាយករដ្ឋមន្ត្រី ទទួលភារៈ ក្រសួង មហាផ្ទៃ សាសនា និង កំណែនទូទៅ (តាំងពីថ្ងៃ ២២ កញ្ញា ១៩៧៣) ។

ចប់ ខែធ្នូ ១៩៧៣ គាត់បានដកខ្លួនពីនយោបាយ មកធ្វើស្រែនៅ ប៉ោយប៉ែត ខេត្តបន្ទាយមានជ័យ ។

ថ្ងៃទី ៥ កុម្ភៈ១៩៧៥ សម្តេច សីហនុ និង ក្រុមខ្មែរក្រហម បានផ្សាយបញ្ជី "ជនក្បត់-ជាតិ ៧ នាក់" ដែលនឹងត្រូវផ្តន្ទាទោសដល់ជីវិត ៖ លន់ នល់, សិរិមតៈ, អ៊ិន តាំ, ចេង ហេង, សុស្តែន ហ្វែរណាំងដេស, លន់ ណុន, ឡុង បូរ៉េត ។ ថ្ងៃទី ១៧ មេសា ១៩៧៥ ពេលដែលខ្មែរក្រហមយកភ្នំពេញបាន លោក អ៊ិន តាំ បានភៀសខ្លួនមកស្រុកសៀម ។ នៅទីនោះ គាត់បានបង្កើតទ័ពព្រៃ ប្រឆាំងទៅរបបខ្មែរក្រហម ពេលបន្ទាប់មក សៀមក៏បានបណ្តេញគាត់ ឲ្យចាកចេញពីស្រុកសៀម នៅថ្ងៃទី ២២ ធ្នូ ១៩៧៥ ។

គាត់បានភៀសខ្លួនមកនៅស្រុកបារាំង ។ នៅឆ្នាំ ១៩៧៦ ជាមួយ លោក ស៊ីន សាន អតីត នាយករដ្ឋមន្ត្រី លោក អ៊ិន តាំ បានបង្កើត "សមាគមទូទៅ ខ្មែរនៅបរទេស" (*AGKE*) សម្រាប់ គាំទ្រ និង ផ្តល់ហិរញ្ញវត្ថុដល់ ក្រុមទាហាន សាធារណរដ្ឋខ្មែរ ដើម្បីប្រឆាំងទៅរបបខ្មែរក្រហម ប៉ុល ពត ។ នៅថ្ងៃទី ៤ តុលា ១៩៧៦ គាត់ក៏បានទៅជួបជុំគ្រួសារនៅស្រុកអាមេរិក ។

នៅខែកញ្ញា ១៩៧៩ បន្ទាប់ពីខ្មែរក្រហមធ្លាក់រួច លោក អ៊ិន តាំ បានតែងតាំងជា អគ្គ-លេខាធិការបណ្តោះអាសន្ន របស់ សហព័ន្ធខ្មែរជាតិនិយម ដែលមាន សម្តេច សីហនុ ជាប្រធាន ។

នៅឆ្នាំ ១៩៨១ លោក អ៊ិន តាំ ជា អនុប្រធានទី ២ នៃ ហ្វ៊ុនស៊ិនប៉ិក អនុប្រធានទី ១ ឧត្តសេនីយ ញឹក ជូឡុង ប្រធាន នរោត្តម សីហនុ ។ លោក អ៊ិន តាំ ជាមេបញ្ជាការទ័ពសីហនុនិយម ។ ដោយមានការប្រទូស្តរាយបែកបាក់គ្នាក្នុងជួរ ហ្វ៊ុនស៊ិនប៉ិក លោក អ៊ិន តាំ បានសុំលាឈប់ពីតំណែង នៅថ្ងៃទី ៣១ ធ្នូ ១៩៨៣ ។ គាត់បានវិលត្រឡប់ទៅស្រុកអាមេ-រិកវិញ ។ នៅទីនោះ គាត់បានបង្កើត សមាគមមនុស្សធម៌ "ខ្មែរអមតៈ" ។ ក្នុងឋានៈជាប្រធាន នៃ សមាគមនេះ លោក អ៊ិន តាំ បានត្រូវ រដ្ឋាភិបាល លោក ហ៊ុន សែន អញ្ជើញទៅភ្នំពេញ នៅ ខែមករា ១៩៨៩ ។ ដោយសារទំនាក់ទំនងរបស់គាត់ជាមួយ រដ្ឋាភិបាល

## ចេង ហេង
(១៩១៦ - ១៩៩៦)



ថ្ងៃ៩តុលា១៩៧០ នៅមុខព្រះរាជវាំង លោកចេងហេងប្រកាស ពីព្រះរាជាណាចក្រកម្ពុជា ជាសាធារណរដ្ឋខ្មែរ>



លោក ចេង ហេង កើតនៅឆ្នាំ ១៩១៦ នៅខេត្តតាកែវ ។ បន្ទាប់ពីបញ្ចប់ការសិក្សាមធ្យមសិក្សានៅវិទ្យាល័យស៊ីសុវត្ថិ គាត់បានចូលទៅ សាលាភូមិន្ទរដ្ឋបាល (*ERA*) ។ គាត់បានរៀបអាពាហ៍ពិពាហ៍ជាមួយ កូនស្រីម្នាក់ នៃ កូនស្រីជាច្រើនរបស់ លោក អ៊ឹង ហ៊ី ។ លោក អ៊ឹង ហ៊ី ជាអ្នកប្រៀនប្រដៅរបស់ លោក ប៉ែន នុត ។ លោកមានកូន ៧ នាក់ ។

លោកបានចូលបំរើការងាររដ្ឋបាលជាតំបូង ឆ្នាំ ១៩៤០ នៅខេត្តបាត់ដំបង ដែលនៅពេលនោះ ខេត្តនេះនៅក្រោមការត្រួតត្រារបស់ទ័ពសៀមនៅឡើយ និង បន្ទាប់មកនៅខេត្ត កំពត ព្រៃវែង និង កណ្តាល នៅ ខែមិថុនា ១៩៥៤ ។ នៅ ខែសីហា ១៩៥៥ គាត់ជានាយកពន្ធនាគារកណ្តាលក្រុងភ្នំពេញ ។ គាត់ជាអ្នកជំនាញខាងកសិកម្ម ដោយបានណែនាំធ្វើ អភិវឌ្ឍន៍កសិកម្ម ជាលក្ខណៈឧស្សាហកម្ម ។ គាត់ជាម្ចាស់លើ កសិដ្ឋានដំណាំដូង នៅតំបន់រាម ក្នុងខេត្តកំពត ។ ពីថ្ងៃ ១៩ មេសា ១៩៦០ ដល់ថ្ងៃ ១៧ វិច្ឆិកា ១៩៦១ គាត់ជារដ្ឋលេខាធិការ ក្រសួងកសិកម្ម ។ នៅឆ្នាំ ១៩៦២ គាត់បានជាប់ឆ្នោតជាតំណាងរាស្ត្រនៅមណ្ឌលតាខ្មៅ ។ នៅឆ្នាំ ១៩៦៦ ជាប់ឆ្នោតជាតំណាងរាស្ត្រ មណ្ឌលភ្នំពេញ និង ជាប់ឆ្នោតជាប្រធាន សភាជាតិ នៅឆ្នាំ ១៩៦៩ ។

នៅថ្ងៃ ១៨ មីនា ១៩៧០ នៅពេលដែល សភាទាំងពីរ បោះឆ្នោតទម្លាក់ សម្តេច សីហនុ ពីតំណែងប្រមុខរដ្ឋ លោកមានឋានៈជា ប្រមុខរដ្ឋស្តីទី ។ នៅថ្ងៃទី ១០ មីនា ១៩៧២ បន្ទាប់ពី បាតុកម្មនិស្សិតគគ្រឹកគគ្រេង គាត់បានប្រគល់តំណែងនេះទៅ លោក សេនាប្រមុខ លន់ នល់ ដែលពេលក្រោយមក ថ្ងៃទី ៤ មិថុនា ១៩៧២ លោក លន់ នល់ បានជាប់ឆ្នោតជា ប្រធានាធិបតី សាធារណរដ្ឋខ្មែរ ។ នៅថ្ងៃ ៥ កុម្ភៈ ១៩៧៥ សម្តេច សីហនុ និង ខ្មែរក្រហម បានផ្សាយបញ្ជីខ្មៅ វរជនសាធារណរដ្ឋខ្មែរ ៧ នាក់ ជា "ជនក្បត់ជាតិ" ត្រូវផ្តន្ទាទោសសម្លាប់ចោល៖ លន់ នល់, សិរិមតៈ, អ៊ិន តាំ, ចេង ហេង, សុស្តែន ហ្វែណាំងដេស្ត, លន់ ណុន, ឡុង បូរ៉េត ។

ថ្ងៃទី ១ មេសា ១៩៧៥ គាត់បានអមដំណើរ លោក លន់ នល់ ភៀសខ្លួនមកប្រទេសអាមេរិក ហើយបានរស់នៅប្រទេសនេះ រហូតដល់ឆ្នាំ ១៩៩២ ។ នៅឆ្នាំ ១៩៩៣ គាត់បានវិលត្រឡប់ចូលកម្ពុជាវិញ បានបង្កើត **គណបក្សសម្ព័ន្ធសាធារណរដ្ឋ** ដើម្បីប្រកួតប្រជែងយកអាសនៈនៅ សភាធម្មនុញ្ញ ។ គណបក្សនេះ ទទួលបរាជ័យ គ្មានបានមួយអាសនៈទេ ។ លោក ចេង ហេង បានវិលត្រឡប់ទៅ ស.រ.អ. វិញ និង បានទទួលអនិច្ចកម្មនៅប្រទេសនេះ នៅ ឆ្នាំ ១៩៩៦ ។

សូមអានបន្ថែម៖ កាលប្រវត្តិវិទ្យា ពីឆ្នាំ ១៨៣៥ - ២០១២

ចប់ដោយបរិបូរណ៍





# ប្រវត្តិរបស់ស្រុកបាភ្នំ នៅខេត្តព្រៃវែង

ជាយូរលង់ណាស់មកហើយ ស្រុកបាភ្នំកកើតឡើងដោយមានឈ្មោះថា នគរបាភ្នំ ។ នគរនេះព្រះមហាក្សត្របានដឹកនាំមេទ័ពស្រី និងប្រុសយ៉ាងខ្លាំងពូកែគ្រប់គ្រងលើតំបន់អាណាខេត្តនានាទាំងអស់ ។ ទ័ពការពារនគរបាភ្នំ មានទ័ពបា និងទ័ពមេជាច្រើន ហើយបណ្ដាទ័ពបរទេសតែងបាក់ខ្លបខ្លាចទ័ពនគរបាភ្នំ ។ នៅសម័យនោះ គឺស្រីដែលដណ្ដឹងប្រុស ។ ម្យ៉ាងទៀត ទ័ពបា និងទ័ពមេតែងតែប្រឡងប្រជែងគ្នាលើការងារបំរើនគរ ហើយនាំគ្នាពូនភ្នំប្រឡងប្រជែង ។ ខាងបាគេពូនភ្នំខាងបាខាងមេដែងគេពូនខាងមេដែង និងសន្មត់ផ្កាយព្រឹករះ គឺឈប់សំរាកពូនភ្នំ ។ ពេលនោះទ័ពខាងមេដែលមានល្បិចចង់ឈ្នះទ័ពខាងបាបានធ្វើគោមហោះមួយខ្ពស់នៅខាងគេ ។ ខាងបាកាលបានមើលឃើញគោមនោះរះឡើងស្មានថា ផ្កាយព្រឹករះក៏ឈប់សំរាកពូនភ្នំ ។ ខាងទ័ពមេដែងគេនៅតែពូនភ្នំដល់ផ្កាយព្រឹករះ ។ ដូច្នេះខាងមេដែងគេពូនភ្នំបានខ្ពស់ជាងខាងទ័ពបា ។ គេបន្តប្រឡងប្រជែងគ្នាខាងបាញ់ធ្នូទៅវិញទៅមកទៀត ។ ខាងទ័ពបាគេកាប់ឈើល្អៗធ្វើព្រួញបាញ់ទៅខាងមេដែងជាប់នាមថាភ្នំឈើកាច់ ។ ខាងភ្នំមេដែងមានដើមឈើល្អៗ ដុះរហូតមកដល់សព្វថ្ងៃនេះ ។ ខាងទ័ពភ្នំមេដែងគេកាច់ឈើតូចតាចមិនល្អធ្វើព្រួញបាញ់មកខាងទ័ពភ្នំបា ។ ម្លោះហើយភ្នំឈើកាច់មានដើមឈើតូចតាចទាបមិនល្អដុះរហូតមកដល់សព្វថ្ងៃជាប់នាមមកថាបាភ្នំ និងភ្នំមេដែង ។ បណ្ដាទ័ពភ្នំបា និងភ្នំមេដែងបន្តប្រឡងប្រជែងមហិទ្ធិរិទ្ធដោយភ្នំបាប្រើដីរស្ដរទៅពិតភ្នំមេដែងបាក់មួយជំហៀងខាងជើង ឯទ័ពខាងភ្នំមេដែងប្រើមាន់សម្រាប់កកាយភ្នំបាឱ្យរតាត់រតាយគ្នីគ្នាដូចជាភ្នំមាន់កាយក្លាយមកជាភ្នំធម្មាការជាដើម ។ មេទ័ពមួយមានមហិទ្ធិរិទ្ធខ្លាំងពូកែឈ្មោះ តេជោប្រពន្ធឈ្មោះ រ័ត្ន ជាសិស្សសំណប់ចិត្តរបស់ព្រះមហាក្សត្រគ្រប់គ្រង ។ តេជោ នាង រ័ត្ន មានកូនប្រុសមួយឈ្មោះ មត្តីផល ត្រូវបានបញ្ជូនឱ្យទៅបំពេញវិជ្ជានៅសាលាទ័ពនគរក្រិច ។ ស្ដេចក្រិចទទួលរាប់អានស្រឡាញ់មត្តីផលណាស់ដោយប្រគល់មត្តីផលឱ្យមេទ័ពក្រិចម្នាក់ដែលជាអាចារ្យទេសាបាមោកបង្ហាត់បង្រៀនក្បួនវេទមន្ត និងក្បួនចំបាំងសាងសង់ផងទាំងឡាយ ។ មត្តីផល រៀនសូត្រពូកែលើសសិស្សដទៃពេលនោះស្ដេចក្រិចនិងអាចារ្យទេសាបាមោកទ្រង់សព្វព្រះហឫទ័យនិងស្រឡាញ់ មត្តីផល ណាស់ ។ ស្ដេចក្រិចទ្រង់បញ្ជាឱ្យមេទ័ពក្រិច គឺអាចារ្យទេសាបាមោកខាងលើនេះរកល្បិចយ៉ាងណាកុំឱ្យ មត្តីផល វិលត្រឡប់មកនគរបាភ្នំវិញ ។ មេទ័ព ក្រិចមានកូនក្រមុំមួយឈ្មោះ មេ ស គាត់នឹងផ្សំផ្គុំឱ្យ មត្តីផលចុះកិច្ចសន្យាថា អ្នកឯងត្រូវនៅនគរក្រិច កុំវិលត្រឡប់ទៅនគរវិញ ។ ស្ដេចក្រិចនឹងតែងតាំងអ្នកឯងជាមេទ័ពក្រិច ជាគ្រូនឹងប្រគល់នាទីជាមេទ័ពទៅឱ្យអ្នកឯង ហើយលើកកូនក្រមុំយើងទៅឱ្យអ្នកឯងទៀត ។ តែបើអ្នកឯងក្បត់និងកិច្ចសន្យាយើងនឹងកាត់ក្បាលអ្នកឯងចោល ។ ពេលនោះ មត្តីផល ខ្លាចលោកអាចារ្យទេសាបាមោកជាគ្រូណាស់ក៏យល់ព្រមតាមកិច្ចសន្យា ។ មត្តីផលត្រូវបានតែងតាំងជាមេទ័ពក្រិច ហើយ និងបានផ្សំផ្គុំជាមួយនាង មេ ស ជាប្រពន្ធអស់រយៈកាលបីឆ្នាំមានកូនប្រុសមួយឈ្មោះ គរីជោត ។ កាលនោះនគរបាភ្នំមានកើតសឹកសង្គ្រាម និងទ័ពជិតខាងឈ្លានពានព្រះមហាក្សត្រនគរភ្នំបានត្រាស់បញ្ជាឱ្យតេជោរឹយចាស់ប្រមូលពលវាយបង្ក្រាបសត្រូវ ។ ឆ្លៀតឱកាសនោះតេជោបានផ្ញើសំបុត្រមួយទៅ មត្តីផល ជាកូនបញ្ជាក់ថា ឪពុកមានជំងឺជាទម្ងន់ ។ មត្តីផល បានទទួលសំបុត្រឪពុកហើយក៏តក់ក្រហល់នឹងឪពុកម្ដាយ និងនគរកំណើតគិតវិលត្រឡប់មកនគរកំណើតភ្លាមតែភ័យខ្លាចនិងកិច្ចសន្យាឪពុកក្មេក ហើយក៏សំរេចចិត្តរត់ចោលប្រពន្ធកូនមកដល់នគរបាភ្នំជាស្រុកកំណើតវិញជួបជុំឪពុកម្ដាយ ។ ពេលនោះតេជោនិងនាងរ័ត្ន ជាឪពុកម្ដាយបាននាំ មត្តីផល ទៅបង្គំគាល់ព្រះមហាក្សត្រនគរបាភ្នំនៅប្រាសាទច័ន្ទឆាយា ។ ស្ដេចនគរបាភ្នំទ្រង់សព្វព្រះទ័យតែងតាំង មត្តីផលជាមេទ័ពនគរបាភ្នំ ហើយជាទីប្រឹក្សាផ្ទាល់របស់ព្រះមហាក្សត្រផង ឯលោកតេជោព្រះមហាក្សត្រតែងតាំងជាឧកញ៉ាធម្មាតេជោអមព្រះមហាក្សត្រ ។









តទៅទំព័រទី ២៧

## តមកពីទំព័រទី ០៦ ហេតុអ្វីបានជាខ្មែរត្រូវទៅបោះឆ្នោត...

សន្លឹកឆ្នោតនឹងបែកជា៥ដុំដែលលទ្ធផលនឹងមិនប្រាកដថា បានទៅនរណាជាមុនឡើយ ។ ក៏ប៉ុន្តែអាចនឹងមានព្រឹត្តការណ៍ថ្មីកើតឡើង គឺមានបេក្ខជនខ្លះសង្ស័យថា បេក្ខភាពរបស់ខ្លួនមិនមាំទាំក៏ដកខ្លួនចេញ ហើយផ្ទេរសន្លឹកឆ្នោតនោះទៅឱ្យគាំទ្របេក្ខជនម្នាក់ទៀត ដែលខ្លួនពេញចិត្តនៅពេលមុនបោះឆ្នោតវានឹងទៅកើនសន្លឹកឆ្នោតបេក្ខជនម្នាក់ទៀត យ៉ាងគួរឱ្យកត់សំគាល់បានដែរ នេះគេហៅថា ហ្វៃផ្លេយ ។ ក្នុងស្ថានភាពនៃបេក្ខជនខាងខ្មែរ តើក្នុងបេក្ខជនជាខ្មែរទាំង២នាក់មាននរណាម្នាក់ហ៊ានបរិច្ចាកយ៉ាងនេះ ឬទេ? បើមានអ្នកហ៊ានធ្វើការដកខ្លួនមែននឹងបានជាជំនួយសំខាន់ណាស់ដល់បេក្ខជនខ្មែរម្នាក់ទៀតដែលនៅសល់ ពីព្រោះអ្នកបោះឆ្នោតខ្មែរលែងរារែកចិត្តទៀតហើយ... តែបើមិនហ៊ានទៅវិញ អ្នកបោះឆ្នោតត្រូវពិចារណាឱ្យមែនទែនលែងគួរសមនឹងនរណាបានទៀតហើយ ពីព្រោះត្រូវជ្រើសយកតែម្នាក់ ដូច្នោះរកនរណាដែលមានប្រជាប្រិយភាពក្នុងចំណោមខ្មែរ និងសហគមន៍ឯទៀតៗ ។ គួរកត់សំគាល់ថា បេក្ខជនដែលដឹងថា ខ្លួនមានសំណាងតិច ហើយនៅតែបន្តឈរឈ្មោះនឹងទទួលការស្តីបន្ទោសពីសហគមន៍ថា បានបំផ្លាញធ្វើឱ្យខូចសន្លឹកឆ្នោតខ្មែរម្នាក់ទៀតអាចខកខានមិនបានទទួលលទ្ធផលល្អបាន ។

**តើអ្នកបោះឆ្នោតគួរគិតរបៀបណា ?**

ជាគោលការណ៍ត្រូវឱ្យមានអ្នកបោះឆ្នោតច្រើនផ្តោតអារម្មណ៍ទៅលើបេក្ខជនតែម្នាក់មិនមែនជាការស្រួលទេ ដូច្នេះគេលែងមើលថានរណាជាក្រុមបក្ខពួកគ្នាឯង ឬគ្នាគេ ហើយគេពិភក្សាគ្នារកហេតុផលនៃបំណងពិតនៃការឈរឈ្មោះរបស់បេក្ខជននីមួយៗនៅលើបំណងល្អ ឬក៏ល្បិចកល្បទស្សនៈគ្រប់គ្រងមានអនាគតវែងឆ្ងាយសម្រាប់ខ្មែរអាមេរិកាំង ឬទេ? ប្រាកដជាមិនមែនងាយស្រួលសម្រាប់អាមេរិកាំងស្បែកសដល់ទៅ៣រូប មកឈរឈ្មោះនៅសង្កាត់មីឌុលសិច១៨ដែលភាគច្រើនជាខ្មែរនោះទេ នៅមានកិច្ចពិភក្សាដេញដោលមួយទៀត នៅថ្ងៃទី៤កញ្ញា ខាងមុខរៀបចំដោយឡូសាន់ យូម៉ាសឡូនឹងខ្មែរផុសដែលអ្នកបោះឆ្នោត គួរតាមដានឱ្យយល់ច្បាស់ពីបេក្ខជនរបស់ខ្លួននីមួយៗដែលនឹងមកឆ្លើយសំណួរអ្នកកាសែតម្តងទៀត នៅចុងបញ្ចប់នៃការសម្រេចចិត្តដ៏សំខាន់មួយនេះ ។

សូមរំលឹកថា កាលពីឱកាសបោះឆ្នោតលើកមុន គឺបោះឆ្នោតក្រុមប្រឹក្សាក្រុងឡូវែលមានបេក្ខជនខ្មែរ២រូបឈរឈ្មោះដែរ តែយើងបានឱ្យយោបល់ថា ឱ្យគូសឈ្មោះបេក្ខជនខ្មែរទាំង២រូបបាន ពីព្រោះគេជ្រើសរើសដល់ទៅ៩រូបឯណោះ តែពេលនោះ បេក្ខជនទាំង២រូប ពុំបានទទួលយកឱវាទនេះទេ ដែលជាហេតុធ្វើឱ្យសន្លឹកឆ្នោតបែក ហើយខូចខាតទៅវិញ... រីឯពេលនេះ គេឱ្យគូសបានតែឈ្មោះ១ទេ បើគូសឈ្មោះ២នឹងខូចអសាបង់ហើយ ។




រហូតទៅដល់ថ្ងៃទី៩កញ្ញា ថ្ងៃនៃការជ្រើសយកបេក្ខជនគណបក្សប្រជាធិបតេយ្យតែម្នាក់ទៅប្រជែងជាមួយជម្រើសនៃគណបក្សសាធារណរដ្ឋនាខែវិច្ឆិកា ការអាចនឹងមានព្រឹត្តិការណ៍ចម្លែកៗកើតឡើងជាបន្តបន្ទាប់នឹងធ្វើឱ្យមើលឃើញ ហើយសម្រេចចិត្តប្រសើរជាងមុនបាន ដូច្នេះសូមតាមដានការវិវត្តន៍នេះ ពីព្រោះវាជាការចាប់ផ្តើមមាតិកាថ្មីនៃទីក្រុងខ្មែរឡូវែលយើងនេះ ហើយលោកអ្នកជាម្ចាស់ឆ្នោតមិនអាចទុកវាសនាគ្រួសារលោកអ្នកឱ្យនៅក្នុងដៃមនុស្សមិនច្បាស់លាស់បានទេ ៕

AccuCare
Home Care Agency
Group Adults Foster Care Program

# កម្មវិធីជំនួយផ្នែកថែទាំសុខភាពតាមផ្ទះរដ្ឋ

Homecare Agency
Group Adult Foster Care Program (GAFC)
MassHealth

ជាសេវាមានគុណភាពខ្ពស់ និងទុកចិត្តបាន
បុគ្គលិកមានសណ្ដានចិត្តល្អ និងធ្វើការតាមវិជ្ជាជីវៈ
អ្នកគ្រប់គ្រង និងបុគ្គលិកនិយាយភាសាខ្មែរ

*Compassionate Care & Reliable*
*Professional & Cultural Sensitive*
*Management & Staffs speak Khmer*

កម្មវិធី Group Adult Foster Care (GAFC) គឺជាដំណោះស្រាយល្អបំផុតសំរាប់ចាស់ៗ ខ្មែរយើង ដែលមានប ញ្ហារាំរ៉ៃផ្នែកសុខភាព ឬជរាហើយមិនចង់ ចាកចេញពីលំនៅដ្ឋានខ្លួនឯង ឬមិនចង់បែកពីក្រុមគ្រួសារដែលបានរស់នៅជាមួយគ្នាជាយូរមកហើយ ។ យើងអាចជួយអោយជីវិតលោកអ្នកកាន់តែប្រសើរឡើង តាមរយៈការផ្តល់នូវសេវាថែទាំសុខភាពមួយទល់មួយដល់ផ្ទះលោកអ្នកតែម្តង ។

Accucare Homecare Agency is the perfect solution for seniors and others who are not ready to leave their home for an institutional setting or live with reltives because of illness or chronic conditions. We improve your life by providing one-on-one compassionate senior care in the comfort of your own home.

**ដើម្បីអាចចូលរួមក្នុងកម្មវិធីនេះបានលោកអ្នកត្រូវមានលក្ខណៈដូចខាងក្រោម :**
To be eligibled for GAFC you must:
-រស់នៅផ្ទះរដ្ឋ (live in subsidized or public housing)
-អាយុ ២២ ឆ្នាំឡើងទៅ (age 22 years and older)
-មាស់ហែលស្ទង់ដា (eligible for Masshealth Standard)
-ត្រូវការជំនួយក្នុងការរស់នៅប្រចាំថ្ងៃយ៉ាងហោចណាស់មួយដូចជា មុជទឹក ស្លៀក-ពាក់ ពេលប្រើបន្ទប់ទឹក ចំអិនអាហារ ឬ ពេលដើរ (need daily assistance with one or more personal care tasks such as bathing, dressing, toileting, meal preparation and/or moving)
-មានការអនុញ្ញាតពីគ្រូពេទ្យផ្ទាល់ខ្លួនអ្នក (have physician statement of your condition)
-ត្រូវបានវាយតំលៃផ្នែកសុខភាព និងការអនុម័តយល់ព្រមពីកម្មវិធី (be screened and approved for the program )

**ផលប្រយោជន៍ទទួលបាន :**
Benefits you will get:
-ការថែទាំផ្ទាល់ខ្លួនមួយទល់មួយក្នុងផ្ទះរបស់អ្នករាល់ថ្ងៃមួយថ្ងៃមួយម៉ោងលើការរស់នៅប្រចាំថ្ងៃ (personal care service in your home, up to one hour of service each day)
-ជំនួយលើការគ្រប់គ្រងថ្នាំសង្កូវអ្នក (Medication Managemant)
-ផែនការថែរទាំសុខភាពផ្ទាល់ខ្លួនមួយ ដែលធ្វើឡើងដោយគ្រូពេទ្យ និងខេសមានីជើ (an individual care plan developed by a registered nurse and case manager)
-វាយតំលៃលើសេចក្តីត្រូវការជាប្រចាំជាបន្តបន្ទាប់ (ongoing monitoring of needs)
-សមាជិកអាចទាក់ទងមក ២៤ម៉ោង (24-hour access to services)

**ត្រូវការជ្រើសរើសបុគ្គលិកធ្វើការ PCA/ HHA needed for Lowell, Lynn, Revere, and Boston**

ដើម្បីចុះឈ្មោះសូមទាក់ទងមក
To register, please contact:

ឱក តុលាយុត្តិ ឡូវែល
Tolayuth Ok: Lowell
Tel: (978)735-4955, Fax: (978) 735-4956
Office: 144 Merrimack St., Suite 404. Lowell, MA 01852

# ខ្មែរអ្នកជាតិនិយម

តពីលេខមុន


និពន្ធដោយ ឡឹក សំអឿន ហៅ "ផ្កាយព្រឹក"

ស្តីអំពីការផ្ទេរអំណាចតុលាការ និងនគរបាលមកឱ្យខ្មែរថ្ងៃទី១៧ តុលា ឆ្នាំ១៩៥៣ មានពិធីផ្ទេរអំណាចយោធាមកឱ្យខ្មែរដែលមានសេនាប្រមុខ បារាំង ស្វាំង (Juin) ជាតំណាងកងទ័ពបារាំងដោយបានបង្ហូតចុះនូវទង់ជាតិបារាំងជាស្ថាពរ ។

ថ្ងៃទី ០៨ វិច្ឆិកា ១៩៥៣ ព្រះបាទនរោត្តម សីហនុ វរ្ម័ន ព្រះចៅក្រុងកម្ពុជាធិបតីបានយាងចូលរាជធានីភ្នំពេញវិញដោយជោគជ័យ ។ (ដំណើរនេះ ដូចគ្នានឹងដំណើរដឺហ្គោលចូលក្រុងប៉ារីសតាមដានជើងសម្ព័ន្ធមិត្តដែរ ដូច្នេះទើបមានពាក្យចចារអារាមថា ជ័យជំនះនេះគ្រាន់តែជាឆាកល្ខោនដែលបារាំងបានរៀបចំទុករួចមកហើយ ) ។

នៅចុងខែវិច្ឆិកា ឆ្នាំ១៩៥៣ យៀកមិញបានបង្កើតសកម្មភាពនឹងបន្ថែមកងកម្លាំងកាន់តែច្រើនឡើងនៅលើទឹកដីខ្មែរ ។

នៅថ្ងៃទី ១៧ ធ្នូ ១៩៥៣ ប្រតិបត្តិការសឹកសាមគ្គីបានផ្តើមឡើងនៅនៅឯប្រទេសលាវ និងវៀតណាម គេពុំបានធ្វើកិច្ចចរចាជាមួយបារាំងទេ ព្រោះគេយល់ថា ការតស៊ូរបស់គេនឹងបានទទួលជោគជ័យលើបារាំងនៅពេលដ៏ខ្លីខាងមុខ ហើយសន្និសីទអន្តរជាតិមុខនឹងទទួលស្គាល់នូវឯករាជ្យរបស់គេជាពុំខាន ។

លុះបានដឹងអំពីឯករាជ្យទ្វេភាគីរវាងស្តេច សីហនុ និងបារាំងនៅថ្ងៃទី៨ វិច្ឆិកា ១៩៥៣ នោះមកនៅលើភ្នំដងរែក គណៈកម្មាធិការនាយកនៃចលនាឥស្សរៈរួមខ្មែរបំរើជាតិ ក៏បានបើកសម័យប្រជុំមួយ ដើម្បីជជែកពិភាក្សាអំពីបញ្ហាឯករាជ្យផង អំពីការចូលរួមក្នុងមហាសង្គមជាតិវិញផង (ពេលនោះ ខ្ញុំក៏បានចូលប្រជុំដែរ) ។ ទីប្រជុំបានកត់សម្គាល់ថា :

**១**-ក្នុងរយៈកាលដែលស្តេចសីហនុកំពុងស្វែងរកឯករាជ្យ ស្ថានការណ៍ក្នុងពិភពលោក និងក្នុងភូមិភាគ ជាពិសេសបញ្ហាប្រទេសកូរ៉េ និងបញ្ហាឥណ្ឌូចិនត្រូវតែដោះស្រាយរកសន្តិភាពដោយសន្និសីទអន្តរជាតិ ។

**៧**-នៅឥណ្ឌូចិន ពួកយៀកមិញបានបង្កើនសកម្មភាពយោធាដើម្បីវាយប្រហារផ្តាច់ព្រ័ត្រនៅប្រទេសយួន ហើយពួកគេបានខំព្យាយាមពង្រឹងពង្រីកទីតាំងរបស់គេនៅលើទឹកដីខ្មែរតាមរយៈកងកម្លាំងប្រជាជនខ្មែររំដោះដែលដឹកនាំដោយ សឺន ង៉ុកមិញ ។ នៅចុងខែមេសា ឆ្នាំ១៩៥០ យៀកមិញបានបញ្ជូនកងកម្លាំងរៀបរយប្រមាណ៣.០០០នាក់ពីណាមបូ (កម្ពុជាក្រោម) ចូលមកតាំងមូលដ្ឋាននៅក្នុងខេត្តព្រៃវែង និងស្វាយរៀង តាមសេចក្តីអំពាវនាវរបស់ សឹង ង៉ុកមិញ (នេះជាគ្រោះថ្នាក់មួយយ៉ាងធំដល់កម្ពុជាឯករាជ្យដ៏ពិតប្រាកដ) ។

ដូច្នេះ ឯករាជ្យដែលស្តេច សីហនុ ទទួលពីបារាំងនោះ ជាឯករាជ្យក្លែងក្លាយ ព្រោះនៅមានទ័ពបរទេស គឺទ័ពបារាំង និងទ័ពយួនយៀកមិញតាំងមូលដ្ឋាននៅលើទឹកដីខ្មែរនៅឡើយ ។ ទោះបីបានឃើញភស្តុតាងដែលជាគ្រោះថ្នាក់ដ៏ធំដល់ប្រទេសកម្ពុជាយ៉ាងនេះក៏ដោយ ទីប្រជុំបានសម្រេចចិត្តថា ចលនាឥស្សរៈរួមខ្មែរបំរើជាតិត្រូវតែចូលជាមួយរាជរដ្ឋាភិបាលជាចាំបាច់ ដើម្បីនាំគ្នាទប់ទល់នឹងមហន្តរាយដែលអាចនឹងកើតមានឡើងដោយសារពួកយៀកមិញ ប៉ុន្តែត្រូវបំបែកគ្នាចូលជា២លើក គឺលើកទី១ ដឹកនាំដោយលោក អ៊ា ស៊ីចូវ ដែលមានកងកម្លាំងពីភាគទក្សិណទិស (កំពង់ស្ពឺ) និងភាគឦសានទិស (កំពង់ធំ, កំពង់ឆ្នាំង) ដែលបានចូលរួមជាមួយរាជរដ្ឋាភិបាលនៅខែកុម្ភៈ ឆ្នាំ១៩៥៤ ។ លើកទី២ ដឹកនាំដោយលោក សឺន ង៉ុកថាន់ និងចូលរួមនៅពេលក្រោយ ព្រោះត្រូវរង់ចាំមើលស្ថានការណ៍នៅពេលដែលមានសន្និសីទអន្តរជាតិ ។ សេចក្តីសម្រេចចិត្តនេះ លោក អ៊ា ស៊ីចូវ ជាអ្នកទទួលភារកិច្ចពន្យល់ឱ្យរាជ្យរដ្ឋាភិបាលដឹក ជាពិសេសព្រះករុណា សីហនុ ដើម្បីកុំឱ្យមានការភ័ន្តច្រឡំថា ចលនាឥស្សរៈរួមខ្មែរបំរើជាតិប្រឆាំងនឹងព្រះអង្គ ឬរាជរដ្ឋាភិបាលរបស់ព្រះអង្គ ។

នៅដើមឆ្នាំ ១៩៥៤ មហាអំណាចទាំង៤ គឺ សហរដ្ឋអាមេរិក, អង់គ្លេស, សហភាពសូវៀត និងបារាំងដែលបានប្រជុំគ្នានៅក្រុងប៊ែកឡាំង (Berlin) ប្រទេសអាល្លឺម៉ង់ ដើម្បីដោះស្រាយបញ្ហាអាល្លឺម៉ង់ និងសន្តិភាពនៅអឺរ៉ុបនោះបានសម្រេចចិត្តថា នឹងជួបជុំគ្នានៅក្រុងហ្សឺណែវនៃប្រទេសស្វីស ដើម្បីដោះស្រាយបញ្ហាប្រទេសកូរ៉េ ព្រមទាំងធ្វើឱ្យមានសន្តិភាពនៅឥណ្ឌូចិនដោយបានអញ្ជើញប្រទេសចិនប្រជាមានិតឱ្យចូលរួមប្រជុំផង ។ ថ្ងៃទី ១៣ មីនា ១៩៥៤ ពួក យៀកមិញបានចាប់បវាយប្រហារមូលដ្ឋានទ័ពបារាំងនៅដៀនបៀនភូប្រទេសយួនយ៉ាងខ្លាំងក្លា ។

ក្នុងរយៈពេលនៃការរង់ចាំស្ថានការណ៍ផ្សេងៗនោះ នៅលើភ្នំដងរែកមានវរជន២រូបជាសមាជិកខ្មែរយៀកមិញ គឺអាចារ្យ ប៊ូ និង អាចារ្យ ទុម បានមកសុំជួបជាមួយលោក សឺន ង៉ុកថាន់ ដើម្បីជូននូវដំណឹង២យ៉ាង គឺ:

**១**-យៀកមិញមានគម្រោងការវាយប្រហារចលនាឥស្សរៈរួមខ្មែរបំរើជាតិដែលនៅដល់មិនទាន់ចូលរួមជាមួយរាជរដ្ឋាភិបាល ។ ពួកគេមានកងកម្លាំងពិសេសនៃកងរៀបរយរបស់កងទ័ពវៀតណាមខាងជើងចំនួន២ កងវរសេនាតូចជាជំនួយមានភារកិច្ចវាយប្រហារចលនាឥស្សរៈនៅខេត្តសៀមរាប ហើយមានបេសកកម្មមួយទៀត គឺវាយយកតំបន់ផ្សេងៗក្នុងខេត្តស្ទឹងត្រែងយកធ្វើជាមូលដ្ឋាននៃរដ្ឋាភិបាល សឹង ង៉ុកមិញ ផង ។ ឯកងកម្លាំងយៀកមិញនៅក្នុងកម្ពុជាមានបេសកកម្មត្រូវវាយកម្ទេចចលនាឥស្សរៈរួមខ្មែរបំរើជាតិនៅខេត្តបាត់ដំបង ។

**២**-យៀកមិញបានរៀបចំគណៈប្រតិភូតំណាងរដ្ឋាភិបាល សឹង ង៉ុកមិញ ហើយត្រៀមចាំចូលប្រជុំសន្និសីទអន្តរជាតិ ដែលនឹងមានឡើងនៅពេលខាងមុខ ។

បន្ទាប់ពីបានដំណឹងនេះហើយ លោក សឺន ង៉ុកថាន់ ក៏ប្រញាប់បញ្ជូនដំណឹងនេះបន្តទៅឱ្យរាជរដ្ឋាភិបាលបានដឹងតាមរយៈលោក អ៊ា ស៊ីចូវ ដែលនៅឯភ្នំពេញរួចហើយ ព្រមទាំងបានបញ្ជាទៅមេបញ្ជាការយោធានៅភាគឧត្តរទិសឱ្យត្រៀមរៀបចំកងកម្លាំងសម្រាប់ប្រយុទ្ធទប់ទល់នឹងការវាយប្រហាររបស់កងកម្លាំងជំនួយភាគបស្ចឹមទិសឱ្យប្រុងប្រយុទ្ធទល់នឹងកងកម្លាំងពួកយៀកមិញនៅខេត្តបាត់ដំបង ។

ថ្ងៃទី ២ មេសា ១៩៥៤ មានទ័ពយៀកមិញចំនួន២ កងវរសេនាតូចបានចូលមកខេត្តស្ទឹងត្រែង ហើយបានកាន់កាប់ទីប្រជុំជនវ៉ឺនសៃ ដែលបានត្រូវកងខេមរភូមិន្ទវាយប្រហារនៅស្រែ ជេស ក្រោមកិច្ចដឹកនាំរបស់លោកវរសេនីយ៍ឯក ស កាំខួយ ។ ការប្រយុទ្ធគ្នានេះ បានធ្វើឱ្យកងកម្លាំងយៀកមិញបែកបាក់ខ្ចាត់ខ្ចាយ និងខូចខាតយ៉ាងដំណំ ។ ឯកងខេមរភូមិន្ទមានការខូចខាតយ៉ាងស្រាល ដែលក្នុងចំណោមនោះ លោកអនុសេនីយ៍ត្រី អ៊ុម សារ៉ុច ដែលនៅក្នុងកងវរសេនាតូចឆ័ត្រយោងនោះបានត្រូវរបួស ។ ដោយគ្មានពេលគ្រប់គ្រាន់ដើម្បីប្រមូលទ័ពរបស់ខ្លួនឡើងវិញ ពួកយៀកមិញក៏បានវិលត្រឡប់ចូលទៅវៀតណាមវិញ ពីព្រោះពុំអាចតាំងទីនៅលើដែនដីខ្មែរបានឡើយ ។

ថ្ងៃទី៧ ឧសភា ១៩៥៤ មូលដ្ឋានទ័ពបារាំងនៅដៀនបៀនភូ បានធ្លាក់ទៅក្នុងកណ្តាប់ដៃពួកយៀកមិញ ។

### សន្និសីទហ្សឺណែវ

ថ្ងៃទី ៨ ឧសភា ១៩៥៤ សន្និសីទមួយស្តីពីបញ្ហាឥណ្ឌូចិន បានត្រូវកោះប្រជុំនៅទីក្រុងហ្សឺណែវ ប្រទេសស្វីស ។ មុនថ្ងៃបើកប្រជុំសន្និសីទលោក សឺន ង៉ុកថាន់ បានផ្ញើលិខិតទៅគ្រប់តំណាងប្រតិភូនៃប្រទេសដែលមកចូលរួមមានជាអាទិ៍ គឺប្រទេសបារាំង, អង់គ្លេស, សហរដ្ឋអាមេរិក, សហភាពសូវៀត, ចិនប្រជាមានិត, កម្ពុជា,លាវ,សាធារណរដ្ឋប្រជាធិបតេយ្យវៀតណាម, (យួនខាងជើង), សាធារណរដ្ឋវៀតណាម (យួនខាងត្បូង) ពួកយៀកមិញ ព្រមទាំងពួកអ្នកសង្កេតការណ៍នៃសហរដ្ឋអាមេរិក ដើម្បីបញ្ជាក់ឱ្យគេដឹងនូវគោលជំហររបស់ប្រជាចលនាឥស្សរៈរួមខ្មែរបំរើជាតិដែលជាចលនាតស៊ូរបស់ខ្មែរអ្នករាជានិយមថា បើអង្គប្រជុំសន្និសីទអនុញ្ញាតឱ្យគណៈប្រតិភូរដ្ឋាភិបាល សឹង ង៉ុក មិញ ចូលប្រជុំនោះ ក៏ត្រូវអនុញ្ញាតឱ្យគណៈប្រតិភូចលនាឥស្សរៈរួមខ្មែរបំរើជាតិចូលរួមប្រជុំផងដែរ ។ ក្នុងកិច្ចជជែកគ្នានៃអង្គប្រជុំ ទោះបី ផាន់ វ៉ាន់ដុង ប្រធានគណៈប្រតិភូសាធារណរដ្ឋប្រជាធិបតេយ្យវៀតណាមបានខំព្យាយាមបញ្ចុះបញ្ចូលឱ្យគេទទួលយល់ព្រមឱ្យគណៈប្រតិភូរដ្ឋាភិបាល សឹង ង៉ុកមិញ ចូលរួមប្រជុំផង យ៉ាងណាក៏ដោយចុះ ក៏អង្គប្រជុំនៅតែបដិសេធជា ពិសេសប្រតិភូនៃប្រទេសចិនមានិតនិងសហភាពសូវៀតបានបដិសេធយ៉ាងខ្លាំង ។

សន្និសីទនេះ បានប្រព្រឹត្តទៅអស់រយៈពេលជាង២ខែ ទើបបានចប់នៅពេលដែល ម៉ង់ដេហ្វ្រង់ស៍ (Pierre Mendes-France) ឡើងកាន់ដំណែងជានាយករដ្ឋមន្ត្រីបារាំង ។ សន្និសីទនេះ បានធ្វើសេចក្តីសម្រេចចិត្តនៅថ្ងៃ ទី២០ កក្កដា ១៩៥៤ លើកិច្ចព្រមព្រៀងដែលមានគោលសំខាន់ៗ ដូចតទៅ :

"....ប្រទេសវៀតណាមត្រូវបែងចែកជា២ភាគ ដោយយកខ្សែស្របទី១៧ ជាខ្សែខណ្ឌសីមានៃសាធារណរដ្ឋប្រជាធិបតេយ្យវៀតណាម និងសាធារណរដ្ឋវៀតណាមសេរី ។ នៅឯប្រទេសលាវ និងកម្ពុជាកងទ័ពបរទេសទាំងអស់ទាំងបារាំង ទាំងយៀកមិញ ត្រូវដកចេញឱ្យអស់ពីប្រទេសទាំងពីរនេះ ។ កងកម្លាំងរំដោះលាវ និងកងកម្លាំងរំដោះខ្មែរត្រូវទម្លាក់អាវុធ ហើយត្រូវចូលរួមជាមួយរាជរដ្ឋាភិបាលរៀងៗខ្លួនរួចរៀបចំបោះឆ្នោតដោយសេរី ។ ដើម្បីអនុវត្តនូវកិច្ចព្រមព្រៀងនេះឱ្យបានត្រឹមត្រូវ និងយុត្តិធម៌គណៈកម្មការត្រួតពិនិត្យអន្តរជាតិមួយ (Inter national Comission of Supervision and Contrl) ត្រូវបង្កើតឡើងដោយមានប្រទេសឥណ្ឌាជាប្រធាន, ប្រទេសកាណាដា និងប៉ូឡូញ ជាសមាជិក ។

បន្ទាប់ពីបានឮព័ត៌មានតាមវិទ្យុផ្សាយសម្លេង B.B.C ដែលបានប្រកាសនូវសេចក្តីសម្រេចចិត្តនៃសន្និសីទហ្សឺណែវនោះមក លោក សឺន ង៉ុកថាន់ **តទៅលេខក្រោយ**

តមកពីទំព័រទី ១៩ ## ប្រវត្តិរបស់ស្រុកបាភ្នំ...

ពេលនោះព្រះមហាក្សត្រទ្រង់បញ្ជាឧកញ៉ា ធម្មាតេជោ និងមគ្គីផល ប្រមូលទ័ពមានទ័ពដំរី ទ័ពដំបងដែក ស្នរលំពែង ទ័ពទូងស្គរ ផ្លូ ស្នា ទ័ព បោសលាន ដើម្បីទៅបង្ក្រាបទ័ពឈ្លានពាន ។ ពេលនោះទ័ពបរទេសត្រូវបរាជ័យបាក់ខ្លួបខ្លាចពី នគរបាភ្នំ ។ ព្រះមហាក្សត្រនគរភ្នំទ្រង់សព្វព្រះ-ហឫទ័យត្រាស់បញ្ជាឱ្យទ័ពរក្សាជ័យជំនះ ។ ដូច នេះទ័ពត្រូវបោះពង្រាយជុំវិញនគរបាភ្នំមានតាំង មុខភ្នំ ព្រៃដំរី រហូតដល់ភ្នំមេដែង ។ ឯស្តេចនគរក្រិច កាលបើដឹងថា មគ្គីផល រត់ចោលនគរក្រិច ប្រពន្ធ កូន ហើយក្បត់និងកិច្ចសន្យា ក៏ត្រាស់ បញ្ជាឱ្យមេទ័ពក្រិចដែលជាអាចារ្យទេសាបាមោក មគ្គីផល ឱ្យមានវិធានការតាមសម្លាប់ មគ្គីផល ។ អាចារ្យទេសាបាមោកក៏ធ្វើហិបយន្តមួយថ្វាយ ស្តេចក្រិច និងផ្ញើរសារមកស្តេចនគរបាភ្នំដោយ សង្កតធ្ងន់ថា ហិបយន្តអ្នកខ្លាំងពូកែទើបអាច បើកបាន ។ បើបើកមិនបានទេ នគរក្រិច និង លើកទ័ពមកកំទេចនគរបាភ្នំដាក់ជាចំណុះ ។ ព្រះ មហាក្សត្រនគរបាភ្នំ ក៏បានរិះរកអ្នកខ្លាំងពូកែ ដើម្បីបើកហិបនោះ ។ ពេលនោះ មគ្គីផល ដឹង ខ្លួនថា ហិបយន្តនេះច្បាស់ជាឪពុកក្មេកផ្ញើរឱ្យ មកកាត់ក្បាលគាត់ហើយ ហើយហិបនេះមានតែ រូបគាត់ទេទើបបើកបាន ។ មគ្គីផល ស្រឡាញ់ នគរ និងព្រះមហាក្សត្របាននិយាយដំណើររឿង នេះ ជូនឧកញ៉ាតេជោជាឪពុកស្លាប់ ។ ឧកញ៉ាធម្មា តេជោក៏នាំដំណឹងនេះទៅបង្គំគាល់ស្តេច ។ ស្តេច ទ្រង់ត្រាស់បញ្ជាឱ្យនាម៉ឺនសព្វមន្ត្រី និងពលទាំង អស់ដង្ហែរ មគ្គីផល ចូលបង្គំគាល់ស្តេច នៅ



ប្រាសាទ ច័ន្ទឆាយា ហើយស្តេចត្រាស់បញ្ជាឱ្យ មគ្គីផល បើកហិបនោះភ្លាម ។ ពេលនោះហិប យន្តបើកបានក៏ម៉ាស៊ីនយន្តកាត់ក្បាលមគ្គីផល ធ្លាក់ចូលក្នុងហិបរួចត្រឡប់វិញ ទៅនគរក្រិច ។ ព្រះមហាក្សត្រនគរភ្នំនាម៉ឺនសព្វមន្ត្រីបណ្តាមេទ័ព និងពលទ័ពទាំងអស់រន្ធត់ស្មារតីនិងស្តាយ មគ្គីផល។ ស្តេចទ្រង់ត្រាស់បញ្ជាឱ្យតំកល់សព មគ្គីផល នៅ ប្រាសាទ ច័ន្ទឆាយា ដោយធ្វើបុណ្យឧទ្ទិសចំនួន៧ ថ្ងៃ ៧ យប់ ហើយទ្រង់ត្រាស់បញ្ជាកំណត់បុណ្យ រំលឹកវិញ្ញាណខក្ខ័ន្ធ មគ្គីផល ចំនួន៣ថ្ងៃជារៀង រាល់ឆ្នាំ ដោយកំណត់ឱ្យអាណាខេត្តតំបន់បណ្តា មេទ័ពត្រូវនាំសួយសារអាករ និងរៀបចំបុណ្យ នេះ ហើយត្រូវយកមនុស្សអស់ជីវិតមកកាត់ ក្បាលបូជាយញ្ញគោរពបូជាជូនវិញ្ញាណខក្ខ័ន្ធ មគ្គីផល ដែលជាអ្នកខ្លាំងពូកែស្នេហាជាតិ ។ តំណរ ក្រោយមក គេធ្វើបុណ្យនៅថ្ងៃ ១៣.១៤.១៥ កើតខែជេស្ឋ រៀងរាល់ឆ្នាំ ដោយហៅថា បុណ្យ ឡើងអ្នកតា ។

ឯនាង មេ ស និង គរីជោតជាកូន នៅ ឯនគរក្រិចដឹងថាប្តី និងជាឪពុកត្រូវហិបយន្ត របស់ឪពុក និងជីតាកាត់ក្បាលយកទៅនគរក្រិច ហើយនោះ មានការសោកស្តាយអាណិតប្តីក៏នាំ គ្នាមកដល់នគរបាភ្នំពេលដែលនគរបាភ្នំកំពុងតំកល់ សព មគ្គីផល ធ្វើបុណ្យ ។ ពេលនោះឧកញ៉ា ធម្មា តេជោ និងនាង រ័ត្ន ជាឪពុកក្មេកនាំនាង មេស និង គរីជោត ជាកូនប្រសារ និងជាចៅទៅថ្វាយ បង្គំគាល់ព្រះមហាក្សត្រនៅប្រាសាទច័ន្ទឆាយា ។ ស្តេចទ្រង់ជ្រាបហើយសព្វព្រះទ័យតែងតាំងនាង មេ ស ជាមេទ័ពនគរភ្នំ ជំនួសមគ្គីផល ជាប្តី និង គរីជោត ជាទីប្រឹក្សាផ្ទាល់របស់នាង មេ ស ជាម្តាយ ។ នាង មេ ស និង គរីជោត បានទៅឃើញ សាកសពប្តីដែលតំកល់ធ្វើបុណ្យនៅប្រាសាទច័ន្ទ ឆាយា រយៈកាល៧ថ្ងៃ ៧ យប់. គរីជោត គិត ជប់សពឪពុកឱ្យរស់ឡើងវិញ ដោយយកក្បាល មនុស្សផ្សេងៗមកតភ្ជាប់ និងខ្លួនឪពុកតែរកពុំ បាន ។ ពេលនោះស្តេចទ្រង់ត្រាស់បញ្ជាឱ្យនាង មេ ស និង គរីជោត ដើរត្រួតពលទាំងអស់គរី ជោតបានឃើញដំរីមួយ ហើយកាត់ក្បាលដំរីនោះ មកជប់តភ្ជាប់ខ្លួនឪពុកនៅព្រៃជុបខាងលិចភ្នំ សព្វថ្ងៃហៅថាព្រៃជុប ។ ឪពុកបានរស់ឡើងវិញ តែខ្លួនជាមនុស្សក្បាលជាសត្វដំរី ហើយគេហៅថា គណេស ។ នាង មេ ស ជាមេទ័ពនគរភ្នំ និង គរីជោត បានបំរើស្តេចបំរើទ័ព និងប្រជាពលករ បានសុខក្សេមក្សាន្តសម្បូររុងរឿងដោយអនុវត្ត តាមព្រះរាជបញ្ជាបុណ្យ រំលឹកគុណ មគ្គីផល ដែលតមកហៅថា បុណ្យឡើងអ្នកតា៕


**ហាងខ្មែរជួសជុលរថយន្ត**

**បើចង់ឱ្យរថយន្តលោកអ្នករត់បានល្អ សូមអញ្ជើញ**

**Rathe´s Auto Service**

State and Emission Inspaction General Repairs and Maintenance

MON-SAT, 8:30AM-5:30PM
SUN. EMERGENCY ONLY

Rathe's Auto Service
2153292418 · ហាងជួសជុលរថយន្ត · CELL2154316376
5105 N. 2ND ST. PHILA, PA 19120

- ជាងមានបទពិសោធន៍ជាយូរឆ្នាំ -ជួសជុលរថយន្តគ្រប់ប្រភេទ
- មានដូរប្រេង ដូរប្រ៉ាំង ដូរកង់ និងករណីជាច្រើនទៀត ។
- មានត្រួតពិនិត្យគ្រឿងម៉ាស៊ីន DIAGNOSTICS ដោយឥតគិតថ្លៃ
- មានចុះថ្លៃពិសេស ចាប់ពីខែកុម្ភៈ ២០០៨ ទៅ : - ដូរប្រេងកំរិត ៥ ក្វាត $22
- INSPECTIONS រថយន្តឆ្នាំ 96 up $49.99+ តាក់ -មានជូនប័ណ្ណពិសេស សំរាប់ដូរប្រេងចុះថ្លៃពាក់កណ្តាល នៅពេលយកមកជួសជុលអស់តម្លៃ $150.
- តម្លៃជួសជុលទូទៅ សមរម្យ ដោយទាបជាងហាងជួសជុលផ្សេងៗទៀត ។
- ប្តេជាចិត្តធ្វើជូនដោយហ្មត់ចត់ គុណភាពខ្ពស់ មិនឱ្យខុសបំណងលោកអ្នកឡើយ។ ពិសេស ជួយទៅពិនិត្យដល់កន្លែងនូវរថយន្តណាដែលខូច STARTER ឬ ធុងអាគុយអស់ភ្លើងដោយឥតគិតថ្លៃ ។ *សូមអរគុណ !*

5105 N.2ND ST., PHILADELPHIA, PA 19120. TEL : (215) 329-2418
Fax : (215) 329-2419. Rath CELL : (215) 431-6376



**ANGKOR AUTO SERVICE,INC.**

**ហាងជួសជុលរថយន្ត "អង្គរ"**

Free Estimate

Auto Body and Maintenance

BODY WORKS
Auto glass and windshields
Auto Frame Straightening and Painting

មានបទពិសោធន៍២០ឆ្នាំ ជាជាងរថយន្តមាន សញ្ញាប័ត្រវាយតម្លៃការងារដោយឥតយកថ្លៃ ហើយយើងជួយសន្សំប្រាក់តម្លៃបន្ថយរបស់ អិនស្វ៊ីរ៉ិនបានផង យើងផ្តល់សេវាគ្រប់យ៉ាង :

ENGINE AND TRANSIMISSION SERVICES
State Inspection
Check Engine Light Diagnostic
Timing Belt Services
Complete Tune Up:
-Brake -Muffler -Struts
-Water Pump -A/C
-Bearing Services

From the moment you get into car accident, we will take care of you from towing to calling your insurance, and to get a rental car for you. With Angkor Auto, you can be worried free.

4835 N. 16th Street. Philadelphia, PA 19141
Tel : (215) 455-7810 / Ricky : (215) 485-1425

# Connect with over 20,000 residents in Lowell!



Soben Pin, Managing Partner




KhmerPost USA - Your portal to the 2nd largest Cambodian-American population in the United States

Free Full Color Biweekly Bilingual Cambodian-American Newspaper available over 100 locations serving Greater Lowell, Lynn, Boston and beyond.

**Call 978-677-7163** for a free quote today!







KhmerPost USA | 45 Merrimack St., Suite 218A | Lowell, MA, 01852
Phone: 978.677.7163 | Fax : 978-677-7092
www.khmerpost.us | Info@khmerpost.us




The Cambodian-American Biweekly Newspaper

សារព័ត៌មានខ្មែរ-អាមេរិក ចេញពីរសប្តាហ៍ម្តង

a free local newspaper reaching over 20,000 Cambodian readers in the Greater Lowell area every two weeks.

ផ្តល់ជូនកាសែតឥតគិតថ្លៃដល់អ្នកអានខ្មែរច្រើនជាង២០០០០នាក់នៅតំបន់ឡូវែលរាល់ពីសប្តាហ៍ម្តង

Soben Pin, Managing Partner អ្នកគ្រប់គ្រង សុបិន្ត ពិន

978.677.7163 (Office) 978. 656.8141 (Mobile)

សូមកក់ពាណិជ្ជកម្មអ្នកជាមួយយើងខ្ញុំ ហើយទទួលបានការបញ្ចុះតម្លៃ២០%

Reserve Your 2014 Ads with us today and receive up to 20% OFF!

(Please mention this coupon ad: Summer 2014)

Sample of our affordable pricing បញ្ជីតម្លៃពាណិជ្ជកម្មក្នុងតម្លៃសមរម្យ

| ទំហំទំព័រ Page Size | ប្រវែង Length x Width | 1ខែ 1 month | 3 ខែ 3 months 10%OFF | 6 ខែ 6 months 15%OFF | 12 ខែ 12 months 20%OFF |
|---|---|---|---|---|---|
| 1/2 page color | (6.5"x10") | $484 | $440/m | $411/m | $387/m |
| 1/4 page color | (6.5"x5") | $264 | $240/m | $224/m | $211/m |
| 1/4 Classify Ad | (6.5"x5") | $160 | | | |
| 1/8 Classify ad | (3.25"x5") | $100 | | | |
| Business Card | | $50 | | | |

Our 2014 Publishing Dates កាលវិភាគបោះពុម្ព

September 5th & 19th
October 10th & 24th
November 7th & 21st
December 5th & 19th

*all ad materials are due one week prior to publishing date.

រាល់គំរូពាណិជ្ជកម្មត្រូវបញ្ជូន1សប្តាហ៍មុនចូលរោងពុម្ព




Call or Visit our Sales Office

45 Merrimack Street. Suite 218A. Lowell, MA 01852

Tel: 978.677.7163. Cell: 978. 656.8141 Fax: 978.677.7092

Email: sobenpin@khmerpost.us or KhmerPostUSA@gmail.com

www.khmerpost.us | www.facebook.com/KhmerPostUSA



# ជោគជតារាសីលោកអ្នក ទាំង១២ ប្រចាំឆ្នាំអាង

## ឆ្នាំជូត



រាល់កិច្ចការដែលលោកអ្នកប៉ង ប្រាថ្នាជាយូរមក ហើយនោះក្នុងរយៈពេលនេះ គឺបានសមដូចបំណង ហើយគ្មានអ្វីមករារាំងនោះទេ ហើយរាល់ការប៉ងយាយីពីមនុស្សដែលមានបំណងមិនល្អមកលើលោកអ្នកនោះក៏មិនបានសម្រេចដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញអាចពង្រីកអាជីវកម្មឱ្យធំបន្ថែមទៀតបាន ។ ឯបញ្ហាស្នេហាគូស្វាមីភរិយាមានភាពសុខដុមរមនាគ្មានផលរមាស់អ្វីឡើយ ៕

## ឆ្នាំឆ្លូវ



លោកអ្នកគួរប្រុងប្រយ័ត្នចំពោះការនិយាយស្តីបន្តិច ពីព្រោះអាចនឹងមានគូសត្រូវចាំចាប់ទោសកំហុសមួលបង្កាច់បង្ខូចកេរ្តិ៍ឈ្មោះរបស់លោកអ្នកឱ្យប្រែក្លាយទៅជាស្មុយអសោចិ៍ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញមានក្រុមមនុស្សតាមឈ្នានីសច្រើន ដូចច្នេះត្រូវប្រយ័ត្នបន្តិចចៀសវាងការបរាជ័យ ។ រីឯបញ្ហាស្នេហាមានភាពចម្រូងចម្រាសដាក់គ្នាបន្តិចបន្តួច ៕

## ឆ្នាំខាល



លោកអ្នកអាចនឹងមានអារម្មណ៍ច្របូកច្របល់បន្តិចនៅក្នុងរយៈពេលនេះ ព្រោះកិច្ចការដែលថា នឹងទទួលបានផលល្អនោះ វាអាចមានការប្រែប្រួលដោយសារតែមានការរំខានពីអ្នកដទៃ ។ បើចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចរកផលកម្រៃគ្រាន់ បើគួរជាទីគាប់ប្រសើរជាងមុន ។ រីឯបញ្ហាស្នេហាពុំមានផលរមាស់អ្វីនោះឡើយ ៕

## ឆ្នាំថោះ



រាល់ការបំពេញការងាររបស់លោកអ្នកក្នុងរយៈពេលនេះសុទ្ធតែផ្តល់នូវអត្ថប្រយោជន៍ គួរឱ្យជាទីពេញចិត្តទាំងអស់គ្មានអ្វីមករាំងស្ទះឡើយ ហើយជាងនេះទៀត នោះគម្រោងការដែលបានត្រៀមទុកជាយូរមក ហើយក៏នឹងបានសម្រេចផងដែរ ។ បើជាអាជីវកររកស៊ីវិញ មានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ រីឯបញ្ហាគូស្នេហ៍ច្រើនយល់ចិត្តគ្នា និងនឹករលឹកគ្នា បើនៅឆ្ងាយ ៕

## ឆ្នាំរោង



លោកអ្នកមានភ័ព្វសំណាងល្អក្នុងការងារទទួលរឿងឡើងតួនាទី ឬប្រាក់បៀវត្សរ៍បន្ថែម ។ ជាងនេះទៀតនោះប្រសិនបើចង់ពឹងពាក់អ្នកមានយសស័ក្តិខ្ពង់ខ្ពស់ក្នុងរឿងអ្វីមួយនឹងបានដូចបំណងផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ អាចរកប្រាក់ចំណូលចិញ្ចឹមគ្រួសារបានដោយស្រួលទេ មិនមានអ្វីមករាំងស្ទះឡើយ ។ រីឯបញ្ហាស្នេហាគូស្នេហ៍រមែងចេះអត់ឱនឱ្យគ្នា ៕

## ឆ្នាំម្សាញ់



រាល់ការស្អុតស្អាញដែលធ្លាប់កើតមានលើលោកអ្នកក្នុងពេលនេះ នឹងត្រូវអហោសិកម្មទាំងអស់ ហើយទ្រព្យដែលរបូតចេញពីដៃទៅនឹងវិលត្រឡប់មកវិញយ៉ាងគ្រប់គ្រាន់ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ ត្រូវគិតគូរឱ្យបានច្បាស់លាស់មុននឹងដាក់ទុនថ្មីទើបមិនខាតបង់រាល់ការចំណាយទាំងនោះ ។ រីឯបញ្ហាស្នេហាត្រូវចេះពូនជ្រោយចំណងស្នេហាដោយមានភាពផ្អែមល្ហែមទើបជាការប្រសើរ ៕

## ឆ្នាំមមី



រាល់ការបំពេញការងារទាំងឡាយលោកអ្នកមិនមានបញ្ហាអ្វីចោទនោះទេ ប៉ុន្តែក្នុងនោះ សូមប្រយ័ត្នកុំយកអាសាមនុស្សសម្បុរសឱ្យសោះ ព្រោះនាំឱ្យកើតរឿងសៅហ្មងទៅថ្ងៃក្រោយ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចសន្សំទុកបានខ្លះ ។ រីឯបញ្ហាស្នេហាចូរកុំយកភាពមានះចង់ចាញ់ឈ្នះប្រយ័ត្នកើតមានជម្លោះវិវាទឈានដល់ការប្រេះស្រាំ ៕

## ឆ្នាំមមែ



លោកអ្នកនឹងទទួលបាននូវលាភសក្ការៈពីភាគហ៊ុនរកស៊ី និងមិត្តរួមការងារយ៉ាងច្រើនគួរឱ្យពេញចិត្ត ។ លើសពីនេះទៅទៀតគម្រោងការដែលបានត្រៀមទុកនឹងបានសម្រេចដូចបំណងទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ គួរជួញដូរនៅទីជិតៗទើបសមប្រកប ។ រីឯបញ្ហាស្នេហាគូស្នេហ៍ចេះស្តាប់ឱវាទគ្នា ៕

## ឆ្នាំវក



ក្នុងរយៈពេលនេះលោកអ្នកជួបនឹងបញ្ហាខាងផ្លូវចិត្តមិនសូវជាសប្បាយរីករាយប៉ុន្មាននោះទេ តែប្រសិនបើចង់ទទួលផលពីការងារនោះ ចូរធ្វើចិត្តឱ្យត្រជាក់ ទើបបានសម្រេចដូចបំណង ។ បើជាអ្នកប្រកបរបររកស៊ីជួញដូរវិញ គឺមានការប្រទាំងប្រទើសជាមួយអ្នកមានមុខរបរដូចគ្នា ដូច្នេះគួរបើកចិត្តឱ្យទូលាយ ។ រីឯបញ្ហាស្នេហាមានការកាំចិត្ត ព្រោះតែម្នាក់ៗចង់ចាញ់ឈ្នះគ្នានោះឯង ៕

## ឆ្នាំរកា



នៅក្នុងរយៈពេលនេះ លោកអ្នកទទួលលាភសក្ការៈពីសាច់ញាតិបងប្អូនដែលជិតស្និទ្ធ ។ ក្រៅពីនោះក៏នៅទទួលបានដំណឹងល្អដែលមានប្រយោជន៍ដល់ជាតិ និងការងាររបស់លោកអ្នកតទៅអនាគតទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញផលកម្រៃទទួលបានកាក់កបគ្រាន់បើតែហាមកុំជួញដូរផ្លូវឆ្ងាញប្រយ័ត្នមានបញ្ហាដល់ខ្លួន ។ រីឯបញ្ហាស្នេហាគូស្នេហ៍អាចមានការរកាំរកូសគ្នាខ្លះ ប៉ុន្តែមិនធ្ងន់ធ្ងរនោះទេ ៕

## ឆ្នាំច



អាចពោលបានថា លោកអ្នកមានសេចក្តីសុខក្នុងជីវិត និងការងារ ព្រោះវិបត្តិ និងភាពស្មុគស្មាញដែលមានកន្លងមកក៏បានធូរស្រាលឡើងវិញមួយកម្រិតផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ ទោះបីជាចេញទៅជួញដូរនៅទីណាក្តី គួរចៀសវាងការដាក់ទុនថ្មីព្រោះអាចនាំឱ្យខាតបង់ ។ រីឯបញ្ហាស្នេហាគូស្នេហ៍ច្រើនប្រចណ្ឌខុសរឿង ៕

## ឆ្នាំកុរ



រាល់កិច្ចការសព្វបែបយ៉ាងលោកអ្នកអាចជួបនឹងបញ្ហាខ្លះៗ នាគ្រាដំបូង ប៉ុន្តែក្រោយមកមិនមានអ្វីជាឧបសគ្គរារាំងទៀតឡើយ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ មានការទិញចូលលក់ចេញគ្រាន់ បើអាចរកផលកម្រៃត្រឡប់មកផ្ទះវិញ យ៉ាងត្រជាក់ចិត្ត ។ រីឯបញ្ហាស្នេហាមានភាពផ្អែមល្ហែម និងស្រស់ស្រាយប្រៀប ដូចត្រីក្នុងទឹកនារដូវខែវស្សាដូច្នេះដែរ ៕

# វិធីបន្ថយទម្ងន់ដូចក្តីប្រាថ្នា



សកម្មភាពការបន្ថយទម្ងន់របស់ស្ត្រីសម័យនេះ ជំហានដំបូងដែលមនុស្សគ្រប់រូបនឹកដល់នោះគឺការបង្អត់អាហារ ឬថាការគ្រប់គ្រងទម្ងន់នោះឯង ។ ទោះបីជាវាជួយឱ្យយើងកាត់បន្ថយទម្ងន់បានក៏ពិតមែនតែមិនយូរប៉ុន្មានវានឹងត្រឡប់ឡើងមកមានទម្ងន់ដូចដើមវិញ ។

ក្រុមអ្នកជំនាញផ្នែកចំណីអាហារឈានមុខគេមួយបានណែនាំពីវិធីបែបងាយៗ ដើម្បីជួយកាត់បន្ថយទម្ងន់លើសនោះ គឺការបម្រែបម្រួលសកម្មភាពការទទួលទានដោយអ្នកមិនត្រូវបណ្តោយឱ្យឃ្លានតទៅទៀតឡើយ ។

**-ហាមផឹកទឹកក្រូច :** ទឹកក្រូចពោរពេញទៅដោយថាមពលជាគីឡូនជូន និងជាតិស្ករប្រមាណ៧ស្លាបព្រា កាហ្វេក្នុងមួយកំប៉ុង ។ បើតាមលទ្ធផលពិសោធន៍គេបានរកឃើញថា ទឹកក្រូច គឺជាអ្នកភ្ញោចឱ្យឡើងទម្ងន់ ព្រោះប្រភេទស្ករនៅក្នុងទឹកក្រូចមានអ័រម៉ូនគ្រប់គ្រងចំណង់ភេសជ្ជៈធ្វើឱ្យយើងចង់ផឹកវាកាន់តែច្រើនឡើង ។

**-ហ៊ឺកហាត់ធ្វើការងារផ្ទះ :** ការបោសច្រាស់ ឬជូតសម្អាតបូមធូលីប្រមាណ៣ម៉ោងក្នុងមួយសប្តាហ៍វាអាចជួយដុតបំផ្លាញថាមពលរហូតដល់ទៅ៣០០០គីឡូជូនធ្វើឱ្យទម្ងន់ថយចុះបាន៥គីឡូក្រាមតែក្នុងរយៈពេល១១ខែ ។ ចំណែកការដាំស្លវិញ វាអាចជួយដុតបំផ្លាញថាមពលបានប្រមាណ៥០០គីឡូជូនក្នុងរយៈពេល៣០នាទី ។ ដូច្នេះប្រសិនបើ ធ្វើអាហាររាល់ក្បាលព្រលប់ អ្នកនឹងអាចកាត់បន្ថយបាន៥គីឡូក្រាម ក្នុងរយៈពេល១០ខែ ។

**-ទទួលទានក្រូចថ្លុងឱ្យបានច្រើន :** បើតាមការពិសោធន៍នៅក្នុងសហរដ្ឋអាមេរិករយៈពេល៣ខែ គេឃើញថាអ្នកដែលទទួលទានក្រូចថ្លុង៣ដងក្នុងមួយថ្ងៃអាចកាត់បន្ថយទម្ងន់ជាមធ្យមបានប្រមាណ១គីឡូក្រាម ដែលអ្នកខ្លះអាចកាត់បន្ថយបានច្រើនរហូតដល់៥គីឡូក្រាមឯណោះ ។ ដូច្នេះក្រូចថ្លុងវាជាផ្លែឈើមួយស្ថិតនៅក្នុងគម្រោងកាត់បន្ថយទម្ងន់បានយ៉ាងមានប្រសិទ្ធភាព ព្រោះវាជួយឱ្យយើងមិនសូវឃ្លានអាហារ ។

**-ឈប់សម្រាកឱ្យបានគ្រប់គ្រាន់ :** មនុស្សដែលទទួលទានដំណេកមិនលក់អាចធ្វើឱ្យទម្ងន់ខ្លួនកើនឡើង បើតាមលទ្ធផលពិសោធន៍គេបានរកឃើញថា អ្នកដែលទទួលទានដំណេកមិនគ្រប់គ្រាន់គេនឹងកើនការទទួលទានឡើង១២០០គីឡូជូនក្នុងមួយថ្ងៃ ។ ដូច្នេះការទទួលទានដំណេកប្រមាណ៨ម៉ោងក្នុងរយៈពេល១យប់ វាជួយឱ្យអ្នកកាត់បន្ថយទម្ងន់បាន៥គីឡូក្រាមក្នុងរយៈពេល៤ខែ ៕





## មជ្ឈមណ្ឌលថែទាំមនុស្សចាស់ក្រុងឡូវែល

**345 Chelmsford St. Lowell, MA 01851/ — www.lowelleldercare.com**

### អ្វីទៅជាមណ្ឌលថែទាំមនុស្សចាស់ក្រុងឡូវែល?

គឺជាលំនៅដ្ឋានកក់ក្តៅមួយ ដែលផ្តល់សេវាមានកម្មវិធីជាក់លាក់ដល់សហគមន៍បំណង៍ គឺគាំទ្រឲ្យមនុស្សចាស់ជរាអាចរស់នៅដោយឯករាជ្យខ្លួនឯង៍ និង៍ជួយឲ្យមានសុខុមាលភាពផ្នែកផ្លូវកាយ ផ្លូវចិត្ត និង៍ផ្នែកសង្គម ។ កម្មវិធីរបស់យើង៍ធានាទូវបរិស្ថានរស់នៅមួយប្រកបដោយសុវត្ថិភាព និង៍មានបរិយាកាសដូចជាផ្ទះរបស់ពួកគាត់ ។

### ទីតាំងនៃមណ្ឌល

ទីតាំង៍អាចរកឃើញដោយង៍ាយក្នុង៍អគារថ្មី ជាមួយនូវការតុបតែង៍រចនាបែបសិល្បៈខ្មែរយ៉ាង៍ល្អប្រណិត ។ មានបន្ទប់ទទួលទានអាហារស្អាត និង៍មានពន្លឺគ្រប់គ្រាន់ បន្ទប់អានសៀវភៅ បន្ទប់កុំព្យូទ័រ បន្ទប់សម្រាក បន្ទប់មើលភាពយន្ត និង៍កន្លែង៍ផ្សេង៍ៗទៀតជាទីពេញចិត្តរបស់លោកអ្នក ។

### មណ្ឌលផ្តល់សេវាដល់មនុស្សចាស់

- មានរថយន្តជូនដំណើរទៅវិញទៅមកពីផ្ទះលោកអ្នក
- ការពិនិត្យ និង៍ថែទាំសុខភាព
- ការព្យាបាលតាមរយៈការហាត់ប្រាណ
- កិច្ចការសង្គម (ផ្តល់ការពិគ្រោះផ្ទាល់ខ្លួន និង៍ក្រុមគ្រួសារ)
- ម្ហូបខ្មែរក្តៅៗ និង៍ចំណីផ្សេង៍ៗ
- ការហាត់ប្រាណសំរាប់សុខភាពរាង៍កាយ
- កម្មវិធីសិល្បៈ និង៍តន្ត្រី
- ការអប់រំពីសុខភាព
- ការពិភាក្សាលើព្រឹត្តិការបច្ចុប្បន្ន (និង៍ការសំណេះសំណាលគ្នា)
- សកម្មភាព និង៍ដំណើរកំសាន្តក្រៅមណ្ឌល

### Our Services

- Door-to-Door Transportation
- Medical Care and Support
- Physical Therapy
- Social Worker
- Khmer Meals and Snacks
- Adaptive Physical Exercise
- Music Programs
- Health Educational Seminars
- Discussions on current events, (and times of reminiscing)
- Outdoor Field Trips



**សូមហៅលេខទូរស័ព្ទ (978) 596-1111**

**Accepting New Patients**

# មជ្ឈមណ្ឌលពេទ្យ និងទទួលព្យាបាល ស៊ី ប៊ី ស៊ី

**AT NEW LOCATION**
**ចាប់បើកហើយ**

# CBC Medical & Walk-In Center

*Serving the Lowell Community for over 20 years!*

**Mon - Fri 8AM-4PM. 1st & 3rd Sat: 8AM-NOON. 978-454-9703**

**ទទួលអ្នកជំងឺថ្មី**

## Services:

- In House Lab & Blood Work
- Immunizations
- Physical Exams
- Emergency Room Follow-Ups
- Nebulizer & Asthma Treatments

- EKG Testing
- Wellness & Preventative Care
- Workers Comp Medical Treatment
- DOT Physicals
- Walk-Ins for Illness & Minor Injury

## Primary Care & Urgent Care Services
**ពេទ្យគ្រួសារ និងសង្គ្រោះបន្ទាន់**

- ពិនិត្យឈាមនៅមន្ទីរពិសោធន៍ក្នុងមជ្ឈមណ្ឌល
- ចាក់វ៉ាក់សាំងការពារ
- ពិនិត្យរាងកាយ
- តាមដានពិនិត្យនៅបន្ទប់ព្យាបាលបន្ទាន់
- ហ្វឹកហាត់ផ្លែកដកដង្ហើម

- ថតចលនាបេះដូង
- ថែទាំសុខភាពទូទៅសម្រាប់គ្រួសារ
- ទទួលព្យាបាលអ្នកទទួលគ្រោះថ្នាក់នៅកន្លែងធ្វើការ
- ពិនិត្យនិងផ្តល់លទ្ធផលបញ្ជាក់ដើម្បីទទួលសិទ្ធ
- អាចពិនិត្យពេលឈឺ និងគ្រោះថ្នាក់ដោយមិនបាច់ណាត់ជួប

**Cambodian Speaking Staff** (បុគ្គលិកនិយាយភាសាខ្មែរ)

**យើងខ្ញុំមានសេចក្តីសោមនស្សជម្រាបជូនលោកអ្នក**
**យើងខ្ញុំនឹងផ្លាស់ទៅទីតាំងថ្មី**
*នៅផ្ទះ16 Pine St Unit #5 Lowell, MA 01851*
*នាថ្ងៃទី 21 កក្កដា ឆ្នាំ 2014*

អរគុណដល់លោកអ្នកទាំងអស់គ្នាដែលបានមកជួបយើង
នៅតូប នាពិធីបុណ្យអុំទូកអាស៊ីអាគ្នេយ៍ ឆ្នាំ២០១៤
*ចាក់ថ្នាំ Flu មកដល់ហើយ



**CBC Staff And Dr. Joshi Welcome You!**
**បុគ្គលិក និងវេជ្ជបណ្ឌិត យូស៊ី សូមស្វាគមន៍លោកអ្នក!**







**CALL TO MAKE AN APPOINTMENT TODAY**
**(សូមទូរស័ព្ទដើម្បីណាត់ជួប)**
**978-454-9703**

# 16 Pine Street Unit #5 Lowell, MA 01851